| | | |
|---|---|---|
| **គណៈកម្មការនិពន្ធ** | លោក ព្រុំ វិបុល | លោកស្រី អន នីថា |
| | លោក សួរ ចន្ទបូរី | លោកស្រី ចុន គន្ធី |
| **អ្នកវាយអត្ថបទ** | លោកស្រី ម៉ៅ សម្ផស្ស | |
| **វិចិត្រករ** | លោក តន់ ជាតិ | |
| **អ្នករៀបរៀង** | លោក ហ៊ុន សាម៉ុល | |
| **អ្នករចនាទំព័រ** | លោកស្រី ម៉ៅ សម្ផស្ស | |
| **គណៈកម្មការពិនិត្យ** | លោក ឡុង សុផេង | លោកស្រី យឹម កុសល |
| | លោក ប៊ូ សន | |

បានទទួលការអនុញ្ញាតឱ្យបោះពុម្ពផ្សាយពី **ក្រសួងអប់រំ យុវជន និងកីឡា** តាមប្រកាសលេខ១៤៦៥ អយក.ប្រក. ចុះថ្ងៃទី០៧ ខែឧសភា ឆ្នាំ២០០៩ ដើម្បីប្រើប្រាស់នៅតាមសាលារៀន។




**គ្រឹះស្ថានបោះពុម្ពនិងចែកផ្សាយ**

បោះពុម្ពលើកទី១៥ ឆ្នាំ២០២០ ចំនួន១៤០ ០០០ច្បាប់

ISBN 9-789-995-000-776

# អារម្ភកថា

សៀវភៅគណិតវិទ្យាថ្នាក់ទី 3 បានចងក្រងនិងរៀបរៀងឡើងក្នុងគោលបំណងជួយដល់សិស្សានុសិស្សក្នុងការសិក្សារៀនសូត្រ ឱ្យយល់ដឹងពីបញ្ញត្តិគណិតវិទ្យានិងបំណិនផ្សេងៗក្នុងគណិតវិទ្យាដូចជា បំណិនក្នុងការគណនានិងបំណិន ក្នុងការដោះស្រាយចំណោទ ។ល ។

ខ្លឹមសារសំខាន់ៗនៃសៀវភៅនេះបានរៀបចំតាមស្តង់ដារកម្មវិធីសិក្សា តាមកម្មវិធីសិក្សាលម្អិតនៃមុខវិជ្ជាគណិតវិទ្យាថ្នាក់ទី 3 ដែលបានផលិត និងបោះពុម្ពផ្សាយដោយក្រសួងអប់រំ យុវជន និងកីឡាជាអាទិ៍មាន ចំនួន រង្វាស់រង្វាល់ ធរណីមាត្រ ពីជគណិត លំនាំគំរូ និងស្ថិតិ ។ ខ្លឹមសារដែលបញ្ចូលថ្មីនៅក្នុងសៀវភៅគណិតវិទ្យាថ្នាក់ទី 3 នេះ មានការបង្គត់ចំនួននិងឱកាស ។

យើងខ្ញុំសង្ឃឹមថាសិស្សានុសិស្សនិងប្រិយមិត្តអ្នកអាននឹងទទួលបានលទ្ធផលល្អប្រសើរពីការប្រើប្រាស់សៀវភៅនេះនិងសូមថ្លែងអំណរគុណទុកជាមុនរាល់ការរិះគន់ផ្សេងៗដើម្បីកែលម្អសៀវភៅនេះឱ្យកាន់តែប្រសើរឡើង ។

គណៈកម្មការនិពន្ធ

# បញ្ជីអត្ថបទ

# 1 ចំនួនដល់ 10 000

## ការរាប់បន្ថែមម្តង 100

ក.




ដូចនេះ ចំនួនទាំងអស់មាន 1 000 ។

ខ.




ដូចនេះ ចំនួនទាំងអស់មាន 500 ។

## ការរាប់បន្ថែមម្តង 1 000




ដូចនេះ ចំនួនទាំងអស់មាន 10 000 ។

# លំហាត់

1. ចូររាប់បន្ថែមម្តង 100

ក.



ចំនួនទាំងអស់មាន 3 300

ខ.



ចំនួនទាំងអស់មាន

គ.



ចំនួនទាំងអស់មាន

ឃ.



ចំនួនទាំងអស់មាន

2. ចូររាប់បន្ថែមម្តង 1 000

ក.



ចំនួនទាំងអស់មាន ..........

ខ.



ចំនួនទាំងអស់មាន ..........

គ.

2 500 → 3 500 → → → →

ឃ.

5 000 → 6 000 → → → →

# ការអាននិងសរសេរចំនួន



ទាំងអស់មានចំនួន 1 400 ។

អានថា មួយពាន់បួនរយ ។



ទាំងអស់មានចំនួន 2 120 ។

អានថា ពីរពាន់មួយរយម្ភៃ ។



ទាំងអស់មានចំនួន 3 125 ។

អានថា បីពាន់មួយរយម្ភៃប្រាំ ។



ទាំងអស់មានចំនួន 4 301 ។

អានថា បួនពាន់បីរយមួយ ។




- ចំនួន **7 430** អានថា **ប្រាំពីរពាន់បួនរយសាមសិប** ។

- ចំនួនប្រាំបីពាន់ប្រាំបួនរយហាសិបប្រាំពីរ ។

  សរសេរជាលេខ ៖ 8 957



# លំហាត់

1. ចូរសរសេរចំនួនជាលេខនិងពាក្យ

ក. 

400

បួនរយ

ខ. 

..........

..........

គ. 

..........

..........

ឃ. 

..........

..........

ង. 

..........

.........

2. ចូរសរសេរពាក្យអានចំនួន

ក. 8 851 .......................................... ។

ខ. 7 634 .......................................... ។

គ. 9 070 .......................................... ។

ឃ. 1 078 .......................................... ។

3. ចូរផ្គូផ្គង

| |
|---|
| 4 216 |
| ប្រាំពាន់ពីររយដប់មួយ |
| 3 412 |
| មួយពាន់ប្រាំបួនរយម្ភៃ |
| បីពាន់ប៉ែតសិបប្រាំបី |

| |
|---|
| បីពាន់បួនរយដប់ពីរ |
| 1 920 |
| បួនពាន់ពីររយដប់ប្រាំមួយ |
| 3 088 |
| 5 211 |

# ខ្ទង់និងតម្លៃលេខតាមខ្ទង់



| 3 000 | 700 | 60 | 4 |
|---|---|---|---|
| បីពាន់ | ប្រាំពីររយ | ហុកសិប | បួន |

| ខ្ទង់ពាន់ | ខ្ទង់រយ | ខ្ទង់ដប់ | ខ្ទង់រាយ |
|---|---|---|---|
| 1 000 1 000 1 000 | 100 100 100 100 100 100 100 | 10 10 10 10 10 10 | 1 1 1 1 |
| 3 | 7 | 6 | 4 |

ចំនួន **3 764** អានថា **បីពាន់ប្រាំពីររយហុកសិបបួន** ។

3 764 = 3 000 + 700 + 60 + 4




លេខ 3 នៅខ្ទង់ពាន់មានតម្លៃ 3 000

លេខ 7 នៅខ្ទង់រយមានតម្លៃ 700

លេខ 6 នៅខ្ទង់ដប់មានតម្លៃ 60

លេខ 4 នៅខ្ទង់រាយមានតម្លៃ 4 ។



## លំហាត់

1. ចូរប្រាប់តម្លៃលេខតាមខ្ទង់នៃចំនួន

**ក.** 7 754

លេខ 7 នៅខ្ទង់រយមានតម្លៃ .................... ។

លេខ 5 នៅខ្ទង់ដប់មានតម្លៃ .................... ។

**ខ.** 5 555

លេខ 5 នៅខ្ទង់ពាន់មានតម្លៃ .................... ។

លេខ 5 នៅខ្ទង់រាយមានតម្លៃ .................... ។

2. ចូរសរសេរជាទម្រង់ពង្រាយ

**ក.** 


**ខ.** 


**គ.** 


**ឃ.** 


**ង.** 


**ច.** 


**ឆ.** 


**ជ.** 


3. ចូរបង្កើតចំនួនធំបំផុតនិងតូចបំផុតដោយប្រើប័ណ្ណលេខដែលឱ្យ

**ក.** 


**ខ.** 


**គ.** 


**ឃ.** 

# ការប្រៀបធៀបនិងរៀបលំដាប់ចំនួន

ប្រៀបធៀបចំនួន 4 756 និង 4 658




| ពាន់ | រយ | ដប់ | រាយ |
|---|---|---|---|
| 4 | 7 | 5 | 6 |
| 4 | 6 | 5 | 8 |




ដូចនេះ ចំនួន 4 756 ធំជាងឬច្រើនជាងចំនួន 4 658

ឬចំនួន 4 658 តូចជាងឬតិចជាងចំនួន 4 756 ។

សរសេរ ៖ 4 756 > 4 658 ឬ 4 658 < 4 756 ។

## លំហាត់

1. ចូរបំពេញសញ្ញា " < ; > ឬ = " ក្នុង ☐

| | | |
|---|---|---|
| ក. 1 417 ☐ 1 317 | ខ. 3 029 ☐ 3 136 | គ. 5 472 ☐ 5 470 |
| ឃ. 4 563 ☐ 3 694 | ង. 6 081 ☐ 6 197 | ច. 7 115 ☐ 7 115 |
| ឆ. 8 936 ☐ 8 937 | ជ. 9 174 ☐ 9 174 | ឈ. 7 908 ☐ 6 998 |

2. ចូររៀបលំដាប់ចំនួនពីធំទៅតូចនិងច្រាសមកវិញ

ក. 5 900 5 600 5 700 6 000 5 800

ខ. 3 410 3 310 3 110 3 210 3 510

# ការអាន សរសេរលេខផ្លូវ លេខរថយន្ត លេខទូរស័ព្ទ និងឆ្នាំ




អានថា ផ្លូវលេខម្ភៃប្រាំបួន




អានថា ផ្ទះលេខសាមសិបបួន




អានថា ភ្នំពេញពីរបេ ប៉ែតសិប សាមសិបប្រាំ




អានថា សូន្យដប់ពីរ ប្រាំបួនរយសែសិបពីរ បួនរយប៉ែតសិបបួន



អានថា គ្រឹស្តសករាជពីរពាន់ប្រាំបី



អានថា ពុទ្ធសករាជពីរពាន់ប្រាំរយហាសិបពីរ



**លេខផ្លូវ លេខផ្ទះ លេខឆ្នាំ យើងអានតាមខ្ទង់ ។**

**លេខរថយន្ត អានម្តងពីរៗតួ ។**

**លេខទូរស័ព្ទ អានម្តងបីៗតួ ។**





# លំហាត់

ចូរមើលរូបរួចសរសេរលេខនិងពាក្យអាន




ផ្លូវលេខ . . . អានថា ..........................




រថយន្តលេខ . . . អានថា ......................




ទូរស័ព្ទលេខ . . . អានថា ......................




ផ្ទះលេខ . . .អានថា ..........................




អានថា គ្រិស្តសករាជ ............................



ម៉ូតូលេខ . . .អានថា .........................



អានថា ពុទ្ធសករាជ .............................




ទូរស័ព្ទលេខ . . .អានថា .....................

# ការបង្គត់ចំនួនដែលមានលេខបួនខ្ទង់ ត្រឹមខ្ទង់ដប់ រយ ពាន់

## ក. បង្គត់ចំនួន 1 754 ត្រឹមខ្ទង់ដប់




## ខ. បង្គត់ចំនួន 1 754 ត្រឹមខ្ទង់រយ




## គ. បង្គត់ចំនួន 1 754 ត្រឹមខ្ទង់ពាន់







ដូចនេះ ការបង្គត់ចំនួនត្រឹមខ្ទង់ដប់ ខ្ទង់រយ ខ្ទង់ពាន់

**បើ តួលេខនៅខ្ទង់តូចបន្ទាប់មាន 5, 6, 7, 8 , 9 យើងបង្គត់ឡើង ។**

**បើ តួលេខនៅខ្ទង់តូចបន្ទាប់មាន 0, 1, 2, 3 ឬ 4 យើងបង្គត់ចុះ ។**

## លំហាត់

ចូរបង្គត់ចំនួន

**ក.** 2 438 បង្គត់ត្រឹមខ្ទង់ដប់គឺ ☐ **ខ.** 7 265 បង្គត់ត្រឹមខ្ទង់ពាន់គឺ ☐

**គ.** 3 543 បង្គត់ត្រឹមខ្ទង់ដប់គឺ ☐ **ឃ.** 5 621 បង្គត់ត្រឹមខ្ទង់រយគឺ ☐

**ង.** 4 267 បង្គត់ត្រឹមខ្ទង់រយគឺ ☐ **ច.** 5 610 បង្គត់ត្រឹមខ្ទង់ពាន់គឺ ☐

# 2 ទម្ងន់

## ការថ្លឹងទម្ងន់

### ក. គីឡូក្រាម

| | |
|---|---|
|  |  |
| ស្ពៃក្ដោបមានទម្ងន់ 3 គីឡូក្រាម ។<br>យើងសរសេរ 3 គក ឬ 3kg ។ | សានមានទម្ងន់ 20 គីឡូក្រាម ។<br>យើងសរសេរ 20 គក ឬ 20kg ។ |

### ខ. ក្រាម ឬ ខាំ

| | |
|---|---|
|  |  |
| ម្រះមានទម្ងន់ 200 ក្រាម ឬ 2 ខាំ ។<br>យើងសរសេរ 200 ក ឬ 200g ។ | មើមឆៃថាវមានទម្ងន់ 500 ក្រាម ឬ 5 ខាំ ។<br>យើងសរសេរ 500 ក ឬ 500g ។ |

**គីឡូក្រាមនិងក្រាមជាឯកតារង្វាស់ទម្ងន់ ។**
**គីឡូក្រាមតាងដោយ "គក" ឬ "kg"**
**ក្រាមតាងដោយ "ក" ឬ "g"**



# លំហាត់

ចូរកត់ត្រាទម្ងន់វត្ថុក្នុង ☐

ក.




អង្គុរមានទម្ងន់ ☐

ខ.




ត្រីមានទម្ងន់ ☐

គ.




ទុរេនមានទម្ងន់ ☐

ឃ.




សាប៊ូមានទម្ងន់ ☐

ង.




មាន់មានទម្ងន់ ☐

ច.




ម្នាស់មានទម្ងន់ ☐

ឆ.




ស្ករមានទម្ងន់ ☐

ជ.




ប៉េងប៉ោះមានទម្ងន់ ☐



# ការប៉ាន់ស្មានទម្ងន់




1. ចូរសង្កេតមើលទម្ងន់នៃវត្ថុនៅខាងស្ដាំដៃ ។
2. ប៉ាន់ស្មានទម្ងន់វត្ថុនៅក្នុងតារាងខាងក្រោម ។
3. ថ្លឹងវត្ថុទាំងនោះដើម្បីទទួលបានទម្ងន់ជាក់ស្ដែង រួចរកការខុសគ្នារវាងទម្ងន់ប៉ាន់ស្មាននិងទម្ងន់ថ្លឹងជាក់ស្ដែង ។
4. បំពេញតារាងខាងក្រោម

| វត្ថុ | ទម្ងន់ប៉ាន់ស្មាន | ទម្ងន់ថ្លឹងជាក់ស្ដែង | ការខុសគ្នា |
|---|---|---|---|
|  | | | |
|  | | | |

5. ពិភាក្សាចម្លើយរបស់អ្នក

## លំហាត់

ចូរប៉ាន់ស្មានទម្ងន់វត្ថុ

ក.




ខ.



## ការប្តូរខ្នាតទម្ងន់




ដើម្បីឱ្យមានលំនឹងយើងត្រូវការកូនទម្ងន់ 100 កចំនួន 10 ។

ដូចនេះ 1 គីឡូក្រាមស្មើនឹង 1 000 ក ។

**1 គក = 1 000 ក**

**ឬ 1kg = 1 000g**



## លំហាត់

1. ចូរប្តូរខ្នាតទម្ងន់ពីគីឡូក្រាមទៅជាក្រាម

| | | |
|---|---|---|
| **ក.** 2 គក = ☐ | **ខ.** 4 គក = ☐ | **គ.** 5 គក = ☐ |
| **ឃ.** 8 គក = ☐ | **ង.** 10 គក = ☐ | **ច.** 7 គក = ☐ |
| **ឆ.** 19 គក = ☐ | **ជ.** 14 គក = ☐ | **ឈ.** 17 គក = ☐ |
| **ញ.** 29 គក = ☐ | **ដ.** 44 គក = ☐ | **ឋ.** 37 គក = ☐ |

2. ចូរប្តូរខ្នាតទម្ងន់ពីក្រាមទៅជាគីឡូក្រាម

| | | |
|---|---|---|
| **ក.** 1 000 ក = ☐ | **ខ.** 3 000 ក = ☐ | **គ.** 6 000 ក = ☐ |
| **ឃ.** 9 000 ក = ☐ | **ង.** 5 000 ក = ☐ | **ច.** 4 000 ក = ☐ |
| **ឆ.** 7 000 ក = ☐ | **ជ.** 2 000 ក = ☐ | **ឈ.** 8 000 ក = ☐ |

# 3 វិធីបូក

## ការបូកចំនួនមានលេខ 4 ខ្ទង់នឹង 2 ខ្ទង់គ្មានត្រាទុក

បណ្ណាល័យមួយមានសៀវភៅ 2 545 ក្បាល ។ គេទិញសៀវភៅ 52 ក្បាលទៀតដាក់បន្ថែមក្នុងបណ្ណាល័យនោះ ។ តើបណ្ណាល័យនោះមានសៀវភៅទាំងអស់ប៉ុន្មានក្បាល ?



ដើម្បីធ្វើប្រមាណវិធីបូកយើងត្រូវសរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចបូកលេខតាមខ្ទង់ ដោយចាប់ផ្ដើមពីខ្ទង់រាយ ។






2 545 + 52 = □

$$\begin{array}{r} 2\,5\,4\,5 \\ +\quad\;\; 5\,2 \\ \hline 2\,5\,9\,7 \end{array}$$

5 បូក 2 ស្មើនឹង 7 សរសេរលេខ 7 ។

4 បូក 5 ស្មើនឹង 9 សរសេរលេខ 9 ។

5 ទម្លាក់ចុះ សរសេរលេខ 5 ។

2 ទម្លាក់ចុះ សរសេរលេខ 2 ។

ដូចនេះ បណ្ណាល័យនោះមានសៀវភៅទាំងអស់ចំនួន 2 597 ក្បាល ។

## ការបង្កើតចំណោទ

5 + 3 = □

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

សំមានសៀវភៅ 5 ក្បាល ។ បងគាត់ឱ្យសៀវភៅថែម 3 ក្បាលទៀត ។
តើសំមានសៀវភៅទាំងអស់ប៉ុន្មានក្បាល?

## លំហាត់

1. ចូររកផលបូក

ក. $\begin{array}{r} 5\,316 \\ +\quad 23 \\ \hline \end{array}$ ខ. $\begin{array}{r} 8\,325 \\ +\quad 53 \\ \hline \end{array}$ គ. $\begin{array}{r} 4\,502 \\ +\quad 76 \\ \hline \end{array}$ ឃ. $\begin{array}{r} 6\,320 \\ +\quad 65 \\ \hline \end{array}$ ង. $\begin{array}{r} 4\,036 \\ +\quad 51 \\ \hline \end{array}$

ច. $\begin{array}{r} 2\,605 \\ +\quad 31 \\ 2 \\ \hline \end{array}$ ឆ. $\begin{array}{r} 4\,213 \\ +\quad 52 \\ 4 \\ \hline \end{array}$ ជ. $\begin{array}{r} 6\,024 \\ +\quad 63 \\ 12 \\ \hline \end{array}$ ឈ. $\begin{array}{r} 7\,210 \\ +\quad 45 \\ 23 \\ \hline \end{array}$ ញ. $\begin{array}{r} 9\,102 \\ +\quad 33 \\ 31 \\ \hline \end{array}$

ដ. 2 903 + 44 ឋ. 3 715 + 32 ឌ. 1 921 + 46

2. ចូរបំពេញផលបូកក្នុង □

ក. 4 321 + 77 = □ ខ. 7 322 + 14 = □ គ. 5 050 + □ = 5 075

## ចំណោទ

1. កសិករម្នាក់បានដាំកៅស៊ូចំនួន 2 550 ដើម ។ កូនប្រុសរបស់គាត់ដាំបាន 45 ដើម ។ តើទាំងពីរនាក់ដាំកៅស៊ូបានប៉ុន្មានដើម?

2. ពូសៅចិញ្ចឹមទា 2 510 ក្បាល មាន់ 55 ក្បាល និងព្រាប 21 ក្បាល ។ តើពូសៅចិញ្ចឹមសត្វបក្សីទាំងអស់ប៉ុន្មានក្បាល?



3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. 3 + 4 = □ ខ. 6 + 7 = □

## ការបូកចំនួនមានលេខ 4 ខ្ទង់នឹង 3 ខ្ទង់គ្មានត្រាទុក

កសិដ្ឋានមួយចិញ្ចឹមពពែញី 3 260 ក្បាលនិងពពែឈ្មោល 425 ក្បាល ។ តើកសិដ្ឋាននោះចិញ្ចឹមពពែទាំងអស់ប៉ុន្មានក្បាល?






ដើម្បីធ្វើប្រមាណវិធីបូកយើងត្រូវសរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចបូកលេខតាមខ្ទង់ ដោយចាប់ផ្ដើមពីខ្ទង់រាយ ។



3 260 + 425 = ☐

$$\begin{array}{r} 3\,2\,6\,0 \\ +\quad 4\,2\,5 \\ \hline 3\,6\,8\,5 \end{array}$$



0 បូក 5 ស្មើនឹង 5 សរសេរលេខ 5 ។

6 បូក 2 ស្មើនឹង 8 សរសេរលេខ 8 ។

2 បូក 4 ស្មើនឹង 6 សរសេរលេខ 6 ។

3 ទម្លាក់ចុះ សរសេរលេខ 3 ។

ដូចនេះ ពពែដែលកសិដ្ឋានចិញ្ចឹមមានចំនួន 3 685 ក្បាល ។

## ការបង្កើតចំណោទ

14 + 5 = ☐

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

> នារីបេះផ្លែត្របែកបាន 14 ផ្លែនិងសុភីបេះបាន 5 ផ្លែ ។
> តើទាំងពីរនាក់បេះផ្លែត្របែកបានប៉ុន្មានផ្លែ?

## លំហាត់

1. ចូររកផលបូក

ក. $\begin{array}{r} 4\,380 \\ +\quad 105 \\ \hline \end{array}$ ខ. $\begin{array}{r} 5\,134 \\ +\quad 424 \\ \hline \end{array}$ គ. $\begin{array}{r} 6\,245 \\ +\quad 632 \\ \hline \end{array}$ ឃ. $\begin{array}{r} 7\,348 \\ +\quad 251 \\ \hline \end{array}$ ង. $\begin{array}{r} 8\,206 \\ +\quad 672 \\ \hline \end{array}$

ច. 2 634 + 124  ឆ. 3 150 + 242  ជ. 4 605 + 372  ឈ. 6 283 + 305

2. ចូរបំពេញផលបូកក្នុង ☐

ក. 2 592 + 103 = ☐  ខ. 3 604 + 203 = ☐  គ. 5 241 + 615 = ☐

3. មុធាគណនា

ក. 3 000 + 500  ខ. 4 000 + 400  គ. 6 000 + 650  ឃ. 7 000 + 430

## ចំណោទ

1. ឈ្មួញម្នាក់លក់អង្គរថ្ងៃទី 1 អស់ 1 250 គក ។ ថ្ងៃទី 2 អស់ 720 គក ។ តើគាត់លក់អង្គរទាំងពីរថ្ងៃអស់ប៉ុន្មានគីឡូក្រាម?

2. នៅថ្ងៃបុណ្យរុក្ខទិវាគេដាំដើមគគីរបានចំនួន 2 330 ដើមនិងដាំដើមឈើទាលបានចំនួន 550 ដើម ។ តើក្នុងថ្ងៃនោះគេដាំដើមឈើទាំងអស់បានចំនួនប៉ុន្មានដើម?



3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. 25 + 5 = ☐  ខ. 34 + 6 = ☐

## ការបូកចំនួនមានលេខ 4 ខ្ទង់នឹង 4 ខ្ទង់គ្មានត្រាទុក

សាលារៀនមួយមានសិស្សប្រុស ចំនួន 1 350 នាក់និងសិស្សស្រីចំនួន 1 436 នាក់ ។ តើសាលារៀននោះមាន សិស្សទាំងអស់ចំនួនប៉ុន្មាននាក់?



ដើម្បីធ្វើប្រមាណវិធីបូកយើងត្រូវ សរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចបូក លេខតាមខ្ទង់ ដោយចាប់ផ្តើមពីខ្ទង់រាយ ។






1 350 + 1 436 = ☐

$$\begin{array}{r} 1350 \\ +\ 1436 \\ \hline 2786 \end{array}$$

0 បូក 6 ស្មើនឹង 6 សរសេរលេខ 6 ។

5 បូក 3 ស្មើនឹង 8 សរសេរលេខ 8 ។

3 បូក 4 ស្មើនឹង 7 សរសេរលេខ 7 ។

1 បូក 1 ស្មើនឹង 2 សរសេរលេខ 2 ។

ដូចនេះ សាលារៀននោះមានសិស្សទាំងអស់ចំនួន 2 786 នាក់ ។

## ការបង្កើតចំណោទ

21 + 17 = ☐

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

ថ្នាក់ទី ៣ "ក" មានសិស្សស្រី 21 នាក់និងសិស្សប្រុស 17 នាក់ ។ តើថ្នាក់ទី ៣ "ក" មានសិស្សសរុបប៉ុន្មាននាក់?

## លំហាត់

1. ចូររកចម្ងាយផ្លូវសរុប




2. ចូរធ្វើប្រមាណវិធីបូក

| ក. | ខ. | គ. | ឃ. | ង. |
|---|---|---|---|---|
| 2 036 | 3 542 | 5 143 | 6 205 | 3 541 |
| + 2 542 | + 4 215 | + 2 631 | + 3 764 | + 6 245 |

| ច. | ឆ. | ជ. | ឈ. | ញ. |
|---|---|---|---|---|
| 3 215 | 6 203 | 5 210 | 7 051 | 2 104 |
| + 213 | + 432 | + 312 | + 1 522 | + 6 302 |
| 21 | 44 | 236 | 121 | 1 532 |

ដ. 2 570 + 1 315 ឋ. 3 207 + 4 350 ឌ. 4 632 + 5 236 ឍ. 5 321 + 4 258

3. ចូរបំពេញផលបូកក្នុង ☐

ក. 3 510 + 3 254 = ☐ ខ. 4 156 + 2 321 = ☐ គ. 4 063 + 5 124 = ☐

## ចំណោទ

1. ស្ថានីយប្រេងមួយលក់ប្រេងពេលព្រឹកអស់ 2 135 ល ។ ពេលល្ងាច
អស់ 1 852 ល ។ តើក្នុងមួយថ្ងៃស្ថានីយនោះលក់ប្រេងអស់ប៉ុន្មានលីត្រ?

2. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. 53 + 15 = ☐ ខ. 34 + 15 = ☐

# ការបូកចំនួនមានលេខ 4 ខ្ទង់នឹង 2 ខ្ទង់មានត្រាទុក

រោងពុម្ពមួយបោះពុម្ពសៀវភៅបានចំនួន 8 528 ក្បាល ។ បន្ទាប់មកគេបោះពុម្ពបានចំនួន 65 ក្បាលទៀតតម្រូវតាមផែនការ ។ តើរោងពុម្ពនោះបោះពុម្ពសៀវភៅទាំងអស់បានចំនួនប៉ុន្មានក្បាល?



ដើម្បីធ្វើប្រមាណវិធីបូកយើងត្រូវសរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចបូកលេខតាមខ្ទង់ ដោយចាប់ផ្ដើមពីខ្ទង់រាយ ។






$8\,528 + 65 = \square$

$$\begin{array}{r} \scriptsize{1}\phantom{8} \\ 8\,5\,2\,8 \\ +\quad 6\,5 \\ \hline 8\,5\,9\,3 \end{array}$$

8 បូក 5 ស្មើនឹង 13 សរសេរលេខ 3 ត្រាទុក 1 ។
1 បូក 2 ស្មើនឹង 3 ហើយ 3 បូក 6 ស្មើនឹង 9 សរសេរលេខ 9 ។
5 ទម្លាក់ចុះ សរសេរលេខ 5 ។
8 ទម្លាក់ចុះ សរសេរលេខ 8 ។

ដូចនេះ រោងពុម្ពនោះបោះពុម្ពសៀវភៅទាំងអស់បាន 8 593 ក្បាល ។

# ការបង្កើតចំណោទ

$25 + 7 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

ម៉ៅស្វ៊ូចត្រីអណ្ដែងបានចំនួន 25 ក្បាលនិងត្រីក្រាញ់បានចំនួន 7 ក្បាល ។ តើម៉ៅស្វ៊ូចត្រីទាំងអស់បានចំនួនប៉ុន្មានក្បាល?

## លំហាត់

1. ចូររកផលបូក

| ក. | ខ. | គ. | ឃ. | ង. |
| --- | --- | --- | --- | --- |
| 3 156 + 25 | 4 638 + 36 | 5 376 + 32 | 6 473 + 65 | 7 148 + 37 |

| ច. | ឆ. | ជ. | ឈ. | ញ. |
| --- | --- | --- | --- | --- |
| 4 203 + 32 + 5 | 5 614 + 21 + 6 | 6 420 + 35 + 62 | 7 131 + 42 + 50 | 8 236 + 25 + 12 |

ដ. 2 159 + 16 ឋ. 3 068 + 28 ឌ. 4 735 + 47 ឍ. 5 062 + 85

2. ចូរបំពេញផលបូកក្នុង ☐

ក. 5 824 + 68 = ☐ ខ. 6 429 + 36 = ☐ គ. 7 557 + 62 = ☐

ឃ. 6 756 + ☐ = 6 781 ង. 7 290 + ☐ = 7 312 ច. ☐ + 35 = 3 650

3. ចូរបំពេញចំនួនក្នុង ☐ ដោយមុធាគណនាតាមលំនាំគំរូ

ក. 2 + 3 = 5 200 + 300 = ☐ 2 000 + 3 000 = ☐

ខ. 4 + 5 + 1 = 10 40 + 50 + 10 = ☐ 400 + 500 + 100 = ☐

គ. 3 + 5 + 2 = 10 30 + 50 + 20 = ☐ 300 + 500 + 200 = ☐

## ចំណោទ

1. ពហុកីឡដ្ឋានមួយមានអ្នកមើលបាល់ទាត់ 1 015 នាក់និងអ្នកមើលបាល់បោះ 86 នាក់ ។ តើចំនួនមនុស្សដែលមើលកីឡាមានទាំងអស់ប៉ុន្មាននាក់?

2. ចូរបង្កើតចំណោទដោយប្រើប្រយោគលេខខាងក្រោម

ក. 27 + 6 = ☐ ខ. 35 + 8 = ☐

## ការបូកចំនួនមានលេខ 4 ខ្ទង់នឹង 3 ខ្ទង់មានត្រាទុក

ហាងមួយលក់ស្បែកជើងក្នុងខែមករាអស់ 1 138 គូនិងខែកុម្ភៈអស់ 785 គូ ។តើក្នុងពីរខែហាងនោះលក់ស្បែកជើងអស់ប៉ុន្មានគូ?






ដើម្បីធ្វើប្រមាណវិធីបូកយើងត្រូវសរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចបូកលេខតាមខ្ទង់ ដោយចាប់ផ្ដើមពីខ្ទង់រាយ ។



1 138 + 785 = ☐

$$\begin{array}{r} \overset{1}{1}\,\overset{1}{1}\,3\,8 \\ +\quad 7\,8\,5 \\ \hline 1\,9\,2\,3 \end{array}$$

8 បូក 5 ស្មើនឹង 13 សរសេរលេខ 3 ត្រាទុក 1 ។
1 បូក 3 ស្មើនឹង 4 ហើយ 4 បូក 8 ស្មើនឹង 12 សរសេរលេខ 2 ត្រាទុក 1 ។
1 បូក 1 ស្មើនឹង 2 ហើយ 2 បូក 7 ស្មើនឹង 9 សរសេរលេខ 9 ។
1 ទម្លាក់ចុះ សរសេរលេខ 1 ។

ដូចនេះ ក្នុងពីរខែហាងនោះលក់ស្បែកជើងអស់ 1 923 គូ ។

## ការបង្កើតចំណោទ

18 + 16 = ☐

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

រដ្ឋាចិញ្ចឹមមាន់ចំនួន 18 ក្បាលនិងទាចំនួន 16 ក្បាល ។
តើសត្វដែលរដ្ឋាចិញ្ចឹមមានចំនួនប៉ុន្មានក្បាល?

## លំហាត់

1. ចូររកផលបូក

ក. $\begin{array}{r} 1\,285 \\ +\ \ 106 \\ \hline \end{array}$ ខ. $\begin{array}{r} 2\,517 \\ +\ \ 235 \\ \hline \end{array}$ គ. $\begin{array}{r} 4\,352 \\ +\ \ 375 \\ \hline \end{array}$ ឃ. $\begin{array}{r} 6\,587 \\ +\ \ 165 \\ \hline \end{array}$ ង. $\begin{array}{r} 7\,852 \\ +\ \ 276 \\ \hline \end{array}$

ច. $\begin{array}{r} 1\,973 \\ +\ \ 135 \\ 21 \\ \hline \end{array}$ ឆ. $\begin{array}{r} 3\,056 \\ +\ \ 283 \\ 25 \\ \hline \end{array}$ ជ. $\begin{array}{r} 5\,290 \\ +\ \ 635 \\ 16 \\ \hline \end{array}$ ឈ. $\begin{array}{r} 6\,718 \\ +\ \ 251 \\ 52 \\ \hline \end{array}$ ញ. $\begin{array}{r} 7\,209 \\ +\ \ 352 \\ 85 \\ \hline \end{array}$

ដ. 2 153 + 271 ឋ. 3 765 + 327 ឌ. 4 872 + 532 ឍ. 4 678 + 264

ណ. 7 365 + 761 ត. 7 462 + 673 + 13 ថ. 8 561 + 854 + 22

2. ចូរបំពេញផលបូកតាមជួរដេកនិងជួរឈរក្នុងតារាង

(+ → , ↓)

| 2 546 | 671 | |
|---|---|---|
| 3 382 | 638 | |
| | | |

(+ → , ↓)

| 4 280 | 562 | |
|---|---|---|
| 673 | 488 | |
| | | |

## ចំណោទ

1. ពូសានប្រមូលផលត្រីនៅស្រះទីមួយបាន 1 550 គក និងស្រះទីពីរបាន 923 គក ។ តើពូសានប្រមូលត្រីនៅស្រះទាំងពីរបានប៉ុន្មានគីឡូក្រាម?
2. គេដឹកស្រូវលើកទីមួយបានចំនួន 1 500 បាវ លើកទីពីរចំនួន 750 បាវ លើកទីបីចំនួន 580 បាវ ។ តើគេដឹកស្រូវទាំងអស់បានចំនួនប៉ុន្មានបាវ?
3. ចូរបង្កើតចំណោទដោយប្រើល្បះលេខដូចខាងក្រោម

ក. 35 + 15 = ☐ ខ. 46 + 57 = ☐

## ការបូកចំនួនមានលេខ 4 ខ្ទង់នឹង 4 ខ្ទង់មានត្រាទុក

កសិករម្នាក់លក់ដំឡូងលើកទីមួយអស់ 3 675 គកនិងលើកទីពីរអស់ 2 545 គក ។ តើកសិករនោះលក់ដំឡូងទាំងពីរលើកអស់ប៉ុន្មានគីឡូក្រាម?



ដើម្បីធ្វើប្រមាណវិធីបូកយើងត្រូវសរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចបូកលេខតាមខ្ទង់ ដោយចាប់ផ្ដើមពីខ្ទង់រាយ ។






3 675 + 2 545 = ☐

$$\begin{array}{r} {}^{1\,1\,1}\phantom{0} \\ 3675 \\ +\;2545 \\ \hline 6220 \end{array}$$

5 បូក 5 ស្មើនឹង 10 សរសេរលេខ 0 ត្រាទុក 1 ។

1 បូក 7 ស្មើនឹង 8 ហើយ 8 បូក 4 ស្មើនឹង 12 សរសេរលេខ 2 ត្រាទុក 1 ។

1 បូក 6 ស្មើនឹង 7 ហើយ 7 បូក 5 ស្មើនឹង 12 សរសេរលេខ 2 ត្រាទុក 1 ។

1 បូក 3 ស្មើនឹង 4 ហើយ 4 បូក 2 ស្មើនឹង 6 សរសេរលេខ 6 ។

ដូចនេះ កសិករលក់ដំឡូងទាំងពីរលើកអស់ 6 220 គក ។

## ការបង្កើតចំណោទ

86 + 67 = ☐

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

សុផលបេះស្វាយលើកទីមួយបាន 86 ផ្លែនិងលើកទីពីរបាន 67 ផ្លែ ។ តើសុផលបេះស្វាយទាំងពីរលើកបានប៉ុន្មានផ្លែ?

## លំហាត់

1. ចូរធ្វើប្រមាណវិធីបូកខាងក្រោម

ក. $\begin{array}{r} 1\,257 \\ +\ 1\,324 \\ \hline \end{array}$ ខ. $\begin{array}{r} 2\,563 \\ +\ 1\,253 \\ \hline \end{array}$ គ. $\begin{array}{r} 3\,575 \\ +\ 2\,336 \\ \hline \end{array}$ ឃ. $\begin{array}{r} 5\,683 \\ +\ 3\,562 \\ \hline \end{array}$ ង. $\begin{array}{r} 6\,782 \\ +\ 5\,463 \\ \hline \end{array}$

ច. $\begin{array}{r} 2\,036 \\ +\ 1\,355 \\ 13 \\ \hline \end{array}$ ឆ. $\begin{array}{r} 3\,182 \\ +\ 2\,351 \\ 25 \\ \hline \end{array}$ ជ. $\begin{array}{r} 4\,210 \\ +\ 3\,025 \\ 385 \\ \hline \end{array}$ ឈ. $\begin{array}{r} 5\,274 \\ +\ 4\,815 \\ 1\,032 \\ \hline \end{array}$ ញ. $\begin{array}{r} 6\,365 \\ +\ 5\,632 \\ 2\,507 \\ \hline \end{array}$

ដ. 2 105 + 3 637 ឋ. 3 715 + 2 195 ឌ. 5 370 + 5 267

ឍ. 6 293 + 1 371 ណ 7 516 + 1 256 ត. 8 035 + 712 + 36

ថ. 7 290 + 3 157 + 125 ទ. 8 763 + 4 165 + 235 ធ. 7 162 + 5 631 + 2 018

2. ចូរបំពេញចំនួនតាមលំនាំគំរូខាងក្រោម

ក.




ខ.




## ចំណោទ

1. សុផាទិញកាតាបមួយថ្លៃ 5 700៛ សៀវភៅមួយក្បាលថ្លៃ 2 500៛និងប៊ិកមួយដើមថ្លៃ 1 300៛ ។ តើសុផាចំណាយប្រាក់ទាំងអស់ប៉ុន្មានរៀល?

2. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. 65 + 75 = ☐ ខ. 84 + 36 = ☐

# ការប៉ាន់ស្មានផលបូក

**ក.** ក្រុម "ក" ដាំផ្កាបាន 515 ដើមហើយក្រុម "ខ" ដាំបាន 492 ដើម ។

តើក្រុមទាំងពីរដាំផ្កាបានប្រហែលប៉ុន្មានដើម?

យើងធ្វើការប៉ាន់ស្មានដូចខាងក្រោម

$515 + 492 \approx \square$

" ≈ " ជាសញ្ញាប្រហែល

$$\begin{array}{r} 515 \\ +\ 492 \\ \hline \end{array} \quad \xrightarrow{\text{បង្គត់ទៅ}} \quad \begin{array}{r} 500 \\ +\ 500 \\ \hline 1\,000 \end{array}$$

នៅតួបូកទី1 ខ្ទង់ដប់មានលេខ 1 ។
ដូចនេះយើងបង្គត់ចុះទៅ 500 ។
នៅតួបូកទី 2 ខ្ទង់ដប់មានលេខ 9 ។
ដូចនេះយើងបង្គត់ឡើងទៅ 500 ។

ដូចនេះ ទាំងពីរក្រុមដាំផ្កាបានប្រហែល 1 000 ដើម ។

**ខ.** សប្តាហ៍ទីមួយគេជីកប្រឡាយបានប្រវែង 2 150 ម សប្តាហ៍ទីពីរបាន 892 ម ។

តើទាំងពីរសប្តាហ៍គេជីកប្រឡាយបានប្រហែលប៉ុន្មានម៉ែត្រ?

នៅតួបូកទី 1 ខ្ទង់ដប់មានលេខ 5 ។
ដូចនេះយើងបង្គត់ឡើងទៅ 2 200 ។
នៅតួបូកទី 2 ខ្ទង់ដប់មានលេខ 9 ។
ដូចនេះយើងបង្គត់ឡើងទៅ 900 ។

យើងធ្វើការប៉ាន់ស្មានដូចខាងក្រោម

$2\,150 + 892 \approx \square$

" ≈ " ជាសញ្ញាប្រហែល

$$\begin{array}{r} 2\,150 \\ +\ 892 \\ \hline \end{array} \quad \xrightarrow{\text{បង្គត់ទៅ}} \quad \begin{array}{r} 2\,200 \\ +\ 900 \\ \hline 3\,100 \end{array}$$

ដូចនេះ ទាំងពីរសប្តាហ៍គេជីកប្រឡាយបានប្រហែល 3 100 ម ។

ដើម្បីប៉ាន់ស្មានផលបូក យើងត្រូវបង្គត់តួបូកនីមួយៗត្រឹមខ្ទង់ធំបំផុតរួចធ្វើប្រមាណវិធីបូក ។

## លំហាត់

1. ចូរប៉ាន់ស្មានផលបូក

ក. $3\,825 + 782$ ខ. $5\,903 + 896$ គ. $6\,245 + 1\,930$ ឃ. $8\,075 + 2\,647$ ង. $9\,761 + 7\,203$

ច. $4\,237 + 791 + 86$ ឆ. $6\,375 + 618 + 805$ ជ. $6\,632 + 2\,189 + 475$ ឈ. $5\,057 + 3\,815 + 1\,051$ ញ. $3\,972 + 4\,701 + 1\,250$

2. ចូររកតម្លៃប្រហែល

ក. $1\,250 + 381 \approx$ ☐ ខ. $4\,850 + 2\,185 \approx$ ☐ គ. $6\,035 + 2\,750 + 625 \approx$ ☐

ឃ. $5\,782 + 4\,209 \approx$ ☐ ង. $3\,374 + 2\,965 \approx$ ☐ ច. $5\,763 + 3\,628 \approx$ ☐

3. ចូរប៉ាន់ស្មានផលបូកត្រឹមខ្ទង់ដូចខាងក្រោម

| | ពាន់ | រយ | ដប់ |
|---|---|---|---|
| $6\,284 + 1\,792$ | $6\,000 + 2\,000 = 8\,000$ | $6\,300 + 1\,800 = 8\,100$ (ត្រាទុក 1) | $6\,280 + 1\,890 = 8\,170$ (ត្រាទុក 1 1) |
| $7\,391 + 1\,875$ | | | |
| $5\,704 + 3\,387$ | | | |

## ចំណោទ

សិប្បកម្មមួយផលិតឆ្នាំងនៅសប្តាហ៍ទីមួយបាន 3 125 និងសប្តាហ៍ទីពីរបាន 2 975 ។ តើសិប្បកម្មនោះផលិតបានឆ្នាំងទាំងអស់ប្រហែលប៉ុន្មាន?

# 4 រូបិយវត្ថុ

## ការផ្គុំក្រដាសប្រាក់រៀល



ខ្ញុំមានប្រាក់ 5 000៛ ។ ក្នុងនោះមានប្រភេទក្រដាសប្រាក់ 1 000៛ បីសន្លឹកនិង 500៛ បួនសន្លឹក ។



ខ្ញុំក៏មានប្រាក់ 5 000៛ដែរ ។ តែខ្ញុំមានប្រភេទក្រដាសប្រាក់ 500៛ប្រាំសន្លឹក 2 000៛ មួយសន្លឹក និង100៛ប្រាំសន្លឹក ។







**យើងអាចផ្គុំក្រដាសប្រាក់ដែលមានតម្លៃ 5 000៛បានតាមរបៀបផ្សេងៗទៀត ។**

## លំហាត់

ចូរសរសេរតម្លៃនៃប្រាក់រៀល

ក.



ខ.



# ការប្ដូរក្រដាសប្រាក់រៀល



| មានក្រដាសប្រាក់ 500 រ បីសន្លឹក 200 រ ពីរសន្លឹកនិង 50 រ ពីរសន្លឹក ។ | មានក្រដាសប្រាក់ 200 រ មួយសន្លឹក ។ 500 រ បីសន្លឹកនិង 100 រ បីសន្លឹក ។ |
|---|---|

**ការប្ដូរក្រដាសប្រាក់រៀលគឺប្ដូរក្រដាសប្រាក់មានតម្លៃស្មើគ្នា ។**

## លំហាត់

1. ចូរគូសវង់លេខក្រដាសប្រាក់ឱ្យស្មើនឹងតម្លៃក្រដាសប្រាក់ដើម

ក.  

ខ.  

# ការប្រើប្រាស់ក្រដាសប្រាក់រៀលក្នុងជីវភាពរស់នៅ

| កាតាប | សៀវភៅ | នំ | បាយ | ផ្លែក្រូច |
|---|---|---|---|---|
|  |  |  |  |  |
| 7 000 ៛ | 1 000 ៛ | 500 ៛ | 2 000 ៛ | 1 000 ៛ |

មើលតារាងរួចឆ្លើយនឹងសំណួរខាងក្រោម

1. តើប្អូនៗត្រូវចំណាយប្រាក់ប៉ុន្មានរៀលក្នុងការទិញសំពៀតមួយនិងបាយមួយចាន?

   7 000 ៛ + 2 000 ៛ = ?

   $$\begin{array}{r} 7\,000 ៛ \\ +\ \ 2\,000 ៛ \\ \hline 9\,000 ៛ \end{array}$$

   ដូចនេះខ្ញុំត្រូវចំណាយប្រាក់ 9 000 ៛ ។

2. តើមានការខុសគ្នាប៉ុន្មានរៀលរវាងថ្លៃបាយនិងនំ?

   2 000 ៛ - 500 ៛ = ?

   $$\begin{array}{r} 2\,000 ៛ \\ -\ \ 500 ៛ \\ \hline 1\,500 ៛ \end{array}$$

   ដូចនេះថ្លៃបាយនិងថ្លៃនំខុសគ្នា 1 500 ៛ ។

3. បើប្អូនៗត្រូវការទិញសៀវភៅ 5 ក្បាលតើត្រូវចំណាយប្រាក់ប៉ុន្មានរៀល?

   1000 × 5 = ?

   $$\begin{array}{r} 1\,000 \\ \times\ \ 5 \\ \hline 5\,000 \end{array}$$

   ដូចនេះខ្ញុំត្រូវការចំណាយប្រាក់ 5 000 ៛ ។

4. តើក្រូចក្នុងមួយផ្លែថ្លៃប៉ុន្មានរៀល?

   1 000 ÷ 5 = ?

   $$\begin{array}{r|l} 1\,000 & 5 \\ \hline -10\ \ & 200 \\ \hline 000 & \end{array}$$

   ដូចនេះក្រូចមួយផ្លែថ្លៃ 200 ៛ ។

# លំហាត់

ចូរបំពេញតារាង

| | តម្លៃវត្ថុ | ប្រាក់ដែលទទួលបាន | ប្រាក់ដែលត្រូវអាប់ |
|---|---|---|---|
| ក |  3 000 ៛ | 5 000 ៛ | …………… |
| ខ |  2 500 ៛ | 10 000 ៛ | …………… |
| គ |  500 ៛ | …………… | 500 ៛ |
| ឃ |  8 000 ៛ | …………… | 2 000 ៛ |
| ង | 5 000 ៛  | 10 000 ៛ | …………… |
| ច |  500 ៛ | 5 000 ៛ | …………… |
| ឆ | 6 200 ៛  | 10 000 ៛ | …………… |

# 5 ប្រវែង

## ការវាស់ប្រវែងជាសង់ទីម៉ែត្រ ឬ ហ៊ុន




ខ្មៅដៃមានប្រវែងស្មើនឹង 7 សង់ទីម៉ែត្រ ឬស្មើនឹង 7 ហ៊ុន ។

**សង់ទីម៉ែត្រជាឯកតារង្វាស់ប្រវែង តាងដោយ សម ឬ cm**

## ការវាស់ប្រវែងជាដេស៊ីម៉ែត្រ ឬ តឹក




**ដេស៊ីម៉ែត្រជាឯកតារង្វាស់ប្រវែង តាងដោយ ដម ឬ dm**

**1 ម = 10 ដម ឬ 10 តឹក**

**1 ដម ឬ 1 តឹក = 10 សម ឬ 10 ហ៊ុន**



# លំហាត់

1. ចូរប្រាប់ប្រវែងវត្ថុខាងក្រោម

ក.




ខ.




គ.




ឃ.




ង.




ច.




2. ចូរវាស់ប្រវែងវត្ថុខាងក្រោម

ក.



....................

ខ.



....................

គ.



....................

ឃ.



....................

## ការប៉ាន់ស្មានប្រវែង




1. ចូរមើលរូបខាងលើរួចប៉ាន់ស្មានប្រវែងគូល័រទៀននិងខ្មៅដៃ ។
2. ប្រើបន្ទាត់វាស់ប្រវែងគូល័រទៀន ខ្មៅដៃ រួចរកប្រវែងខុសគ្នារវាងប្រវែងប៉ាន់ស្មាននិងប្រវែងជាក់ស្តែង ។
3. បំពេញតារាងខាងក្រោម

| វត្ថុ | ប្រវែងប៉ាន់ស្មាន | ប្រវែងវាស់ជាក់ស្តែង | ការខុសគ្នា |
|---|---|---|---|
| គូល័រទៀន | | | |
| ខ្មៅដៃ | | | |

## លំហាត់

ចូរប៉ាន់ស្មានប្រវែង

ក.




ខ.




គ.



# ការប្តូរខ្នាតប្រវែង

## ក. ម៉ែត្រទៅសង់ទីម៉ែត្រ




3 ម = ......... សម

3 ម = 1 ម +1 ម +1 ម

= 100 សម +100 សម +100 សម

3 ម = 300 សម

## ខ. ដេស៊ីម៉ែត្រទៅសង់ទីម៉ែត្រ

5 ដម = ......... សម

5 ដម = 1 ដម +1 ដម +1 ដម +1 ដម +1 ដម

= 10 សម +10 សម +10 សម +10 សម +10 សម

5 ដម = 50 សម

# លំហាត់

| | |
|---|---|
| ក. 3 ម = ☐ សម | ខ. 6 ម = ☐ សម |
| គ. 7 ម = ☐ សម | ឃ. 9 ម = ☐ សម |
| ង. 2 ម = ☐ ដម | ច. 5 ម = ☐ ដម |
| ឆ. 8 ម = ☐ ដម | ជ. 4 ម = ☐ ដម |
| ឈ. 12 ដម = ☐ សម | ញ. 15 ដម = ☐ សម |

# 6 វិធីដក

## ការដកចំនួនមានលេខ 4 ខ្ទង់នឹង 3 ខ្ទង់គ្មានខ្ចី

ពូឆាំប្រមូលផលស្រូវបាន 4 556 គក ។ គាត់លក់អស់ 435 គក ។ តើគាត់នៅសល់ស្រូវប៉ុន្មានគីឡូក្រាម?



ដើម្បីធ្វើប្រមាណវិធីដកយើងត្រូវសរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចដកលេខតាមខ្ទង់ ដោយចាប់ផ្ដើមពីខ្ទង់រាយ ។



4 556 – 435 = ☐

$$\begin{array}{r} 4\,5\,5\,6 \\ -\quad 4\,3\,5 \\ \hline 4\,1\,2\,1 \end{array}$$

6 ដក 5 នៅសល់ 1 សរសេរលេខ 1 ។

5 ដក 3 នៅសល់ 2 សរសេរលេខ 2 ។

5 ដក 4 នៅសល់ 1 សរសេរលេខ 1 ។

4 ទម្លាក់ចុះ សរសេរលេខ 4 ។

ដូចនេះ ពូឆាំនៅសល់ស្រូវចំនួន 4 121 គក ។

## ការបង្កើតចំណោទ

8 – 5 = ☐

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

ពូលាស់រកត្រីបាន 8 គក ។ គាត់យកទៅលក់អស់ 5 គក ។
តើគាត់នៅសល់ត្រីប៉ុន្មានគីឡូក្រាមទៀត?

## លំហាត់

1. ចូរធ្វើប្រមាណវិធីដក

ក. $\begin{array}{r} 2\,645 \\ -\ \ 132 \\ \hline \end{array}$ ខ. $\begin{array}{r} 3\,719 \\ -\ \ 205 \\ \hline \end{array}$ គ. $\begin{array}{r} 4\,865 \\ -\ \ 450 \\ \hline \end{array}$

ឃ. $\begin{array}{r} 5\,729 \\ -\ \ 516 \\ \hline \end{array}$ ង. $\begin{array}{r} 6\,934 \\ -\ \ 612 \\ \hline \end{array}$ ច. $\begin{array}{r} 6\,351 \\ -\ \ 230 \\ \hline \end{array}$

ឆ. 5 285 – 155 ជ. 6 754 – 531 ឈ. 7 569 – 437

ញ. 7 564 – 321 ដ. 8 935 – 605 ឋ. 9 865 – 644

ចូរបំពេញផលដកក្នុង □

ក. 6 758 – 534 = □ ខ. 7 896 – 665 = □ គ. 8 964 – 742 = □

ឃ. 6 758 – 237 = □ ង. 7 935 – 423 = □ ច. 4 189 – 128 = □

2. មុធាគណនា

ក. 2 550 – 450 ខ. 4 820 – 520 គ. 5 685 – 575

## ចំណោទ

1. មីងសាយទិញកាសែតចំនួន 1 550 ច្បាប់ ។ គាត់លក់អស់ 450 ច្បាប់ ។ តើគាត់នៅសល់កាសែតប៉ុន្មានច្បាប់?

2. គេធ្វើផ្លូវមួយខ្សែប្រវែង 3 530 ម ។ គេក្រាលកៅស៊ូបានប្រវែង 310 ម ។ តើផ្លូវដែលមិនទាន់ក្រាលកៅស៊ូមានប្រវែងប៉ុន្មានម៉ែត្រ?

3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. 6 – 3 = □ ខ. 10 – 8 = □

## ការដកចំនួនមានលេខ 4 ខ្ទង់នឹង 4 ខ្ទង់គ្មានខ្ចី

សិប្បកម្មមួយដេរខោអាវនៅខែមករា បាន 5 645 សម្រាប់ ។ ខែកុម្ភៈបាន 4 520 សម្រាប់ ។ តើសិប្បកម្មនោះដេរខោអាវនៅខែកុម្ភៈបានតិចជាងខែមករាប៉ុន្មានសម្រាប់?






$5\,645 - 4\,520 = \square$

$$\begin{array}{r} 5645 \\ -\,4520 \\ \hline 1125 \end{array}$$

5 ដក 0 នៅសល់ 5 សរសេរលេខ 5 ។

4 ដក 2 នៅសល់ 2 សរសេរលេខ 2 ។

6 ដក 5 នៅសល់ 1 សរសេរលេខ 1 ។

5 ដក 4 នៅសល់ 1 សរសេរលេខ 1 ។

ដូចនេះ សិប្បកម្មនោះដេរខោអាវនៅខែកុម្ភៈបានតិចជាងខែមករាចំនួន 1 125 សម្រាប់ ។

## ការបង្កើតចំណោទ

$15 - 4 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

សុភីមានប៉ោងៗចំនួន 15 ។ នាងធ្វើបែកប៉ោងៗអស់ 4 ។
តើសុភីនៅសល់ប៉ោងៗប៉ុន្មាន?

## លំហាត់

1. ចូរធ្វើប្រមាណវិធី

ក. $\begin{array}{r} 1\,865 \\ -\ 1\,053 \\ \hline \end{array}$ ខ. $\begin{array}{r} 2\,768 \\ -\ 1\,245 \\ \hline \end{array}$ គ. $\begin{array}{r} 4\,695 \\ -\ 3\,504 \\ \hline \end{array}$ ឃ. $\begin{array}{r} 5\,842 \\ -\ 4\,130 \\ \hline \end{array}$ ង. $\begin{array}{r} 6\,478 \\ -\ 5\,204 \\ \hline \end{array}$

ច. $\begin{array}{r} 7\,393 \\ -\ 5\,162 \\ \hline \end{array}$ ឆ. $\begin{array}{r} 8\,569 \\ -\ 6\,325 \\ \hline \end{array}$ ជ. $\begin{array}{r} 8\,357 \\ -\ 7\,042 \\ \hline \end{array}$ ឈ. $\begin{array}{r} 9\,764 \\ -\ 7\,231 \\ \hline \end{array}$ ញ. $\begin{array}{r} 9\,809 \\ -\ 8\,604 \\ \hline \end{array}$

ដ. 5 870 – 3 250 ឋ. 6 954 – 3 704 ឌ. 7 568 – 4 253 ឍ. 8 657 – 4 523

2. ចូរបំពេញផលដកក្នុង ☐

ក. 5 769 – 2 536 = ☐ ខ. 6 854 – 4 210 = ☐

គ. 6 835 – 5 835 = ☐ ឃ. 7 200 – 2 100 = ☐

3. មុធាគណនា

ក. 6 000 – 1 000 ខ. 5 500 – 2 000 គ. 7 100 – 2 100

## ចំណោទ

1. អង្គភាពដោះគ្រាប់មីនប្រមូលគ្រាប់មីនមិនទាន់ផ្ទុះបានចំនួន 2 435 គ្រាប់ ។ គេកម្ទេចចោលអស់ 1 220 គ្រាប់ ។ តើនៅសល់គ្រាប់មីនមិនទាន់កម្ទេចចោលប៉ុន្មានគ្រាប់ទៀត ។

2. សុផលជំពាក់ប្រាក់នារីចំនួន 7 500 ៛ ។ គាត់បានសងប្រាក់ទៅនារីវិញចំនួន 3 500 ៛ ។ តើសុផលនៅជំពាក់ប្រាក់នារីប៉ុន្មានរៀលទៀត?

3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. 12 – 5 = ☐ ខ. 16 – 9 = ☐

## ការដកចំនួនមានលេខ 4 ខ្ទង់នឹង 2 ខ្ទង់ដោយមានខ្ចី

រមណីយដ្ឋានមួយមានភ្ញៀវមកកំសាន្ត ក្នុងមួយសប្តាហ៍ចំនួន 1 595 នាក់ ។ ក្នុងនោះមានភ្ញៀវបរទេសចំនួន 86 នាក់ ។ តើភ្ញៀវទេសចរជនជាតិខ្មែរមានប៉ុន្មាននាក់?



ដើម្បីធ្វើប្រមាណវិធីដកយើងត្រូវសរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចដកលេខតាមខ្ទង់ ដោយចាប់ផ្តើមពីខ្ទង់រាយ ។



1 595 – 86 = ☐

$$\begin{array}{r} {\scriptstyle 8\ 15} \\ 1\,5\,\cancel{9}\,\cancel{5} \\ -\quad 8\,6 \\ \hline 1\,5\,0\,9 \end{array}$$

5 ដក 6 មិនបានទេ ត្រូវខ្ចី 1 ពីខ្ទង់ដប់យើងបាន 8 ដប់ 15 រាយ ។ 15 ដក 6 នៅសល់ 9 សរសេរលេខ 9 ។ 8 ដក 8 នៅសល់ 0 សរសេរលេខ 0 ។

5 ទម្លាក់ចុះ សរសេរលេខ 5 ។

1 ទម្លាក់ចុះ សរសេរលេខ 1 ។

ដូចនេះ ភ្ញៀវទេសចរជាជនជាតិខ្មែរមានចំនួន 1 509 នាក់ ។

## ការបង្កើតចំណោទ

35 – 8 = ☐

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

> ចៅសៅចិញ្ចឹមមាន់ 35 ក្បាល ។ គាត់លក់មាន់អស់ 8 ក្បាល ។ តើមាន់នៅសល់មានចំនួនប៉ុន្មានក្បាល?

## លំហាត់

1. ចូរគណនាផលដក

ក. 1 863 − 48　　ខ. 2 718 − 35　　គ. 3 065 − 58　　ឃ. 4 768 − 87

ង. 6 325 − 37　　ច. 6 700 − 54　　ឆ. 7 321 − 68　　ជ. 8 352 − 76

ឈ. 3 246 – 38　　ញ. 4 532 – 50　　ដ. 5 245 – 67

ឋ. 6 036 – 48　　ឌ. 6 210 – 28　　ឍ. 7 508 – 29

2. ចូរបំពេញផលដកក្នុង ☐

ក. 3 514 – 56 = ☐　　ខ. 5 295 – 95 = ☐　　គ. 5 560 – 55 = ☐

3. មុធាគណនា

ក. 3 460 – 50　　ខ. 5 295 – 95　　គ. 5 085 – 55

4. ចូររកប្រវែងផ្លូវពីចំណុច ក ទៅ ឃ




## ចំណោទ

1. ពូម៉ៅមានអំបិល 1 350 គក ។ គាត់លក់លើកទីមួយអស់ 146 គកនិង លើកទីពីរអស់ 48 គក ។ តើគាត់នៅសល់អំបិលប៉ុន្មានគីឡូក្រាម?

2. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. 26 – 7 = ☐　　ខ. 45 – 9 = ☐　　គ. 58 – 12 = ☐

## ការដកចំនួនមានលេខ 4 ខ្ទង់នឹង 3 ខ្ទង់ដោយមានខ្ចី

កន្លែងទស្សនាបាល់ទាត់មួយដាក់មនុស្សបានចំនួន 2 550 នាក់ ។ គេលក់សំបុត្រចូលទស្សនាបាន 960 សន្លឹក ។ តើគេត្រូវលក់សំបុត្រចូលទស្សនាប៉ុន្មានសន្លឹកទៀតទើបឱ្យពេញកន្លែង?



ដើម្បីធ្វើប្រមាណវិធីដកយើងត្រូវសរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចដកលេខតាមខ្ទង់ ដោយចាប់ផ្ដើមពីខ្ទង់រាយ ។



$2\,550 - 960 = \square$

$$\begin{array}{r} \overset{1}{\cancel{2}}\overset{14}{\cancel{5}}\overset{15}{\cancel{5}}0 \\ -\quad 960 \\ \hline 1590 \end{array}$$

0 ដក 0 នៅសល់ 0 សរសេរលេខ 0 ។
5 ដក 6 មិនបាន ត្រូវខ្ចី 1 ពីខ្ទង់រយ បាន 4 រយ
15 ដប់ ។ 15 ដក 6 នៅសល់ 9 សរសេរលេខ 9 ។
4 ដក 9 មិនបាន ត្រូវខ្ចី 1 ពីខ្ទង់ពាន់ បាន 1 ពាន់
14 រយ ។ 14 ដក 9 នៅសល់ 5 សរសេរលេខ 5 ។
1 ទម្លាក់ចុះ សរសេរលេខ 1 ។

ដូចនេះ គេត្រូវការលក់សំបុត្រចូលទស្សនាចំនួន 1 590 សន្លឹកទៀត ។

## ការបង្កើតចំណោទ

$45 - 12 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

ថ្នាក់ទី ៣"ក" ដាំផ្កាបាន 45 ដើម ។ បន្ទាប់មកផ្កាងាប់អស់ 12 ដើម ។ តើផ្កាដែលនៅរស់មានចំនួនប៉ុន្មានដើម?

## លំហាត់

1. ចូរធ្វើប្រមាណវិធីដក

ក. $\begin{array}{r} 1\,825 \\ -\ \ 718 \\ \hline \end{array}$ ខ. $\begin{array}{r} 2\,645 \\ -\ \ 472 \\ \hline \end{array}$ គ. $\begin{array}{r} 3\,706 \\ -\ \ 635 \\ \hline \end{array}$ ឃ. $\begin{array}{r} 5\,134 \\ -\ \ 251 \\ \hline \end{array}$

ង. $\begin{array}{r} 6\,025 \\ -\ \ 382 \\ \hline \end{array}$ ច. $\begin{array}{r} 6\,913 \\ -\ \ 785 \\ \hline \end{array}$ ឆ. $\begin{array}{r} 7\,035 \\ -\ \ 671 \\ \hline \end{array}$ ជ. $\begin{array}{r} 8\,174 \\ -\ \ 358 \\ \hline \end{array}$

ឈ. 3 852 – 647  ញ. 4 052 – 680  ដ. 5 340 – 751

ឋ. 5 340 – 751  ឌ. 7 902 – 532  ឍ. 7 812 – 625

2. ចូរបំពេញផលដកតាមជួរដេកនិងជួរឈរក្នុងតារាង

| 5 640 | 850 | |
|---|---|---|
| 760 | 582 | |
| | | |

| 6 712 | 675 | |
|---|---|---|
| 825 | 450 | |
| | | |

3. មុធាគណនា

ក. 7 000 – 500  ខ. 6 000 – 200  គ. 8 500 – 300

## ចំណោទ

1. សុភាខ្ចីប្រាក់សំចំនួន 2 500 ៛ ។ បន្ទាប់មកនាងសងប្រាក់ 800 ៛ទៅសំវិញ ។ តើសុភានៅជំពាក់ប្រាក់សំប៉ុន្មានរៀលទៀត?
2. ស៊ីណាមានប្រាក់ 1 200 ៛ ។ នាងទិញប៊ិកមួយដើមថ្លៃ 400 ៛និងសៀវភៅមួយក្បាលថ្លៃ 500 ៛ ។ តើស៊ីណានៅសល់ប្រាក់ប៉ុន្មានរៀល?
3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. 35 – 10 = ☐  ខ. 28 – 15 = ☐  គ. 65 – 24 = ☐

## ការដកចំនួនមានលេខ 4 ខ្ទង់នឹង 4 ខ្ទង់ដោយមានខ្ចី

គ្រួសារពូឆាំដាំចេកនៅចម្ការទី 1 បាន 3 230 ដើមនិងចម្ការទី 2 បាន 2 455 ដើម ។ តើពូឆាំដាំចេកនៅចម្ការទី 1 បានច្រើនជាងចម្ការទី 2 ប៉ុន្មានដើម?



ដើម្បីធ្វើប្រមាណវិធីដកយើងត្រូវសរសេរចំនួនទាំងពីរឱ្យត្រូវតាមខ្ទង់ រួចដកលេខតាមខ្ទង់ ដោយចាប់ផ្ដើមពីខ្ទង់រាយ ។



3 230 – 2 455 = ☐

$$\begin{array}{r} \overset{2}{\cancel{3}}\,\overset{11}{\cancel{2}}\,\overset{12}{\cancel{3}}\,\overset{10}{\cancel{0}} \\ -\;2\,4\,5\,5 \\ \hline 0\,7\,7\,5 \end{array}$$

0 ដក 5 មិនបាន ត្រូវខ្ចី 1 ពីខ្ទង់ដប់បាន 2 ដប់ 10 រាយ ។

10 ដក 5 នៅសល់ 5 សរសេរលេខ 5 ។

2 ដក 5 មិនបាន ត្រូវខ្ចី 1 ពីខ្ទង់រយបាន 1 រយ 12 ដប់ ។

12 ដក 5 នៅសល់ 7 សរសេរលេខ 7 ។

1 ដក 4 មិនបាន ត្រូវខ្ចី 1 ពីខ្ទង់ពាន់បាន 2 ពាន់ 11 រយ ។ 11 ដក 4 នៅសល់ 7 សរសេរលេខ 7 ។

2 ដក 2 នៅសល់ 0 សរសេរលេខ 0 ។

ដូចនេះ នៅចម្ការទី១ ពូឆាំដាំចេកបានច្រើនជាងចម្ការទី 2 ចំនួន 775 ដើម ។

## ការបង្កើតចំណោទ

42 – 25 = ☐

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

> ថាវីជំពាក់កៅស៊ូនីតាចំនួន 42 ។ នាងយកកៅស៊ូចំនួន 25 ទៅសងនីតា ។ តើថាវីនៅជំពាក់កៅស៊ូនីតាប៉ុន្មានទៀត?

## លំហាត់

1. ចូរធ្វើប្រមាណវិធីដក

ក. $\begin{array}{r} 1\,523 \\ -\ 1\,405 \\ \hline \end{array}$ ខ. $\begin{array}{r} 2\,864 \\ -\ 1\,538 \\ \hline \end{array}$ គ. $\begin{array}{r} 2\,749 \\ -\ 1\,652 \\ \hline \end{array}$ ឃ. $\begin{array}{r} 3\,625 \\ -\ 2\,435 \\ \hline \end{array}$

ង. $\begin{array}{r} 4\,732 \\ -\ 2\,600 \\ \hline \end{array}$ ច. $\begin{array}{r} 5\,064 \\ -\ 3\,218 \\ \hline \end{array}$ ឆ. $\begin{array}{r} 5\,130 \\ -\ 3\,280 \\ \hline \end{array}$ ជ. $\begin{array}{r} 6\,245 \\ -\ 4\,572 \\ \hline \end{array}$

2. ចូរបំពេញផលដកតាមជួរដេកនិងជួរឈរក្នុងតារាង

(− → ជួរដេក, − ↓ ជួរឈរ)

| | | |
|---|---|---|
| 6 520 | 3 218 | |
| 5 460 | 2 530 | |
| | | |

| | | |
|---|---|---|
| 8 615 | 6 109 | |
| 3 723 | 2 025 | |
| | | |

3. មុធាគណនា

ក. 10 000 – 5 000 ខ. 5 000 – 2 500 គ. 8 500 – 5 500

## ចំណោទ

1. ចម្ការទី១ ផ្តល់ផលសណ្តែកបាន 4 320 គក និងចម្ការទី ២ ផ្តល់ផលសណ្តែកបាន 3 650 គក ។ តើចម្ការទី១ ផ្តល់ផលសណ្តែកច្រើនជាងចម្ការទី២ ប៉ុន្មានគីឡូក្រាម?
2. មីងម៉ៅលក់មាន់បានប្រាក់ 9 200 ៛ ។ គាត់យកប្រាក់នេះទៅទិញស្បែកជើងមួយគូអស់ប្រាក់ 4 800 ៛ និងខ្មៅដៃ 5 ដើមអស់ប្រាក់ 3 600 ៛ ។ តើមីងម៉ៅនៅសល់ប្រាក់ប៉ុន្មាន?
3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. 95 – 28 ខ. 67 – 28 គ. 76 – 52

## ការប៉ាន់ស្មានផលដក

ក. កប៉ាល់មួយអាចផ្ទុកទម្ងន់បាន 5 280 គក ។ គេបានដាក់ទំនិញលើកប៉ាល់នោះ 3 870 គក ។ តើកប៉ាល់នោះអាចដាក់ទំនិញទម្ងន់ប្រហែលប៉ុន្មានគីឡូក្រាមទៀត?

$5\,280 - 3\,870 \approx \square$

នៅតួដកទី 1 ខ្ទង់រយមានលេខ 2 ។
ដូចនេះយើងបង្គត់ចុះទៅ 5 000 ។
នៅតួដកទី 2 នៅខ្ទង់រយមានលេខ 8
យើងបង្គត់ឡើងទៅ 4 000 ។

$\begin{array}{r} 5\,280 \\ -\ 3\,870 \\ \hline \end{array}$ → បង្គត់ទៅ → $\begin{array}{r} 5\,000 \\ -\ 4\,000 \\ \hline 1\,000 \end{array}$

ដូចនេះ កប៉ាល់នោះអាចដាក់ទំនិញទម្ងន់ប្រហែល 1 000 គីឡូក្រាមទៀត ។

ខ. ពូឆនមានអំបិល 6 875 គក ។ គាត់លក់អស់ 835 គក ។
តើគាត់នៅសល់អំបិលប្រហែលប៉ុន្មានគីឡូក្រាម?

$6\,875 - 830 \approx \square$

$\begin{array}{r} 6\,875 \\ -\ 830 \\ \hline \end{array}$ → បង្គត់ទៅ → $\begin{array}{r} 6\,900 \\ -\ 800 \\ \hline 6\,100 \end{array}$

ដូចនេះ ពូឆននៅសល់អំបិលប្រហែល 6 100 គកទៀត ។

ដើម្បីប៉ាន់ស្មានផលដក យើងបង្គត់តួដកនីមួយៗត្រឹមខ្ទង់ធំបំផុត រួចធ្វើប្រមាណវិធីដក ។

## លំហាត់

1. ចូរប៉ាន់ស្មានផលដក

ក. $2\,850 - 1\,140$  ខ. $3\,420 - 1\,963$  គ. $4\,985 - 3\,370$  ឃ. $5\,092 - 3\,786$  ង. $6\,791 - 4\,817$

ច. $6\,119 - 768$  ឆ. $7\,806 - 685$  ជ. $7\,142 - 892$  ឈ. $8\,716 - 981$  ញ. $8\,143 - 985$

2. ចូររកតម្លៃប្រហែល

ក. $3\,981 - 3\,132 \approx$ ☐  ខ. $4\,083 - 2\,876 \approx$ ☐  គ. $5\,185 - 325 \approx$ ☐

ឃ. $6\,752 - 985 \approx$ ☐  ង. $3\,374 - 2\,965 \approx$ ☐  ច. $7\,913 - 615 \approx$ ☐

3. ចូរប៉ាន់ស្មានផលដកត្រឹមខ្ទង់ដូចតារាងខាងក្រោម

| | ពាន់ | រយ | ដប់ |
|---|---|---|---|
| $4\,286 - 1\,847$ | $4\,000 - 2\,000 = 2\,000$ | $\overset{3}{\cancel{4}}\overset{13}{\cancel{3}}00 - 1\,800 = 2\,500$ | $\overset{3}{\cancel{4}}\overset{12}{\cancel{2}}90 - 1\,850 = 2\,440$ |
| $5\,819 - 4\,972$ | | | |
| $8\,946 - 6\,193$ | | | |

## ចំណោទ

នៅឃុំមួយមានផ្ទះសរុបចំនួន 1 286 ខ្នង ។ ក្នុងនោះមានផ្ទះ 905 ខ្នងបានធ្វើបង្គន់អនាម័យ ។ តើនៅសល់ផ្ទះប្រហែលប៉ុន្មានខ្នងទៀតដែលគ្មានបង្គន់អនាម័យ?

## ទំនាក់ទំនងរវាងវិធីបូកនិងវិធីដក

ក.



70 + 30 = 100

100 - 30 = 70

ឬ 100 - 70 = 30

ខ.



6 000 + 4 000 = 10 000

10 000 - 4 000 = 6 000

ឬ 10 000 - 6 000 = 4 000



## លំហាត់

ចូរបំពេញផលបូកឬផលដកក្នុង □

ក.
26 + 36 = 62
62 – 36 = □
62 – 26 = □

ខ.
59 + 89 = 148
148 – 89 = □
148 – 59 = □

គ.
349 + 256 = 605
605 – 256 = □
605 – 349 = □

ឃ.
8 200 + 1 500 = 9 700
9 700 – 1 500 = □
9 700 – 8 200 = □

ង.
3 682 + 1 467 = 5 149
5 149 – 1 467 = □
5 149 – 3 682 = □

ច.
5 500 + 2 000 = 7 500
7 500 – 2 000 = □
7 500 – 5 500 = □

ឆ.
85 + 27 = □
□ – 27 = 85
□ – 85 = □

ជ.
458 + 574 = □
□ – 574 = 458
□ – 458 = 574

ឈ.
132 + 218 = □
□ – 218 = 132
□ – 132 = 218

ញ.
3 115 + 2 364 = □
□ – 2 364 = 3 115
□ – 3 115 = 2 364

ដ.
1 985 + 2 507 = □
□ – 2 507 = 1 985
□ – 1 985 = 2 507

ឋ.
9 000 + 1 000 = □
□ – 1 000 = 9 000
□ – 9 000 = 1 000

ឌ.
6 580 + 3 200 = □
□ – 3 200 = 6 580
□ – 6 580 = 3 200

ឍ.
8 650 + 1 200 = □
□ – 1 200 = 8 650
□ – 8 650 = 1 200





បោះពុម្ពផ្សាយឆ្នាំ ២០២០

# 7 មាឌនិងចំណុះ

## ការវាស់ចំណុះជាលីត្រ




ដូចនេះ ប្រេងមួយធុងមានចំណុះ 5 លីត្រ ។

**លីត្រ ជាឯកតាចំណុះតាងដោយអក្សរ ល ឬ ℓ**

## លំហាត់

ចូរប្រាប់ចំណុះជាលីត្រ

ក.




ដបទឹកខ្មេះមានចំណុះ .......... លីត្រ ។

ខ.




កំសៀវទឹកមានចំណុះ .......... លីត្រ ។

គ.




ដបទឹកក្រូចមានចំណុះ .......... លីត្រ ។

ឃ.




ដបប្រេងឆាមានចំណុះ ......... លីត្រ ។

# ការវាស់ចំណុះជាមិល្លីលីត្រ

ទឹកសុទ្ធមួយដបចាក់ចូលទៅក្នុង
បំពង់កែវក្រិតបាន 750 មិល្លីលីត្រ ។
ដូចនេះដបទឹកសុទ្ធមានចំណុះ
750 មិល្លីលីត្រ ។




**មិល្លីលីត្រ ជាឯកតាចំណុះតាងដោយអក្សរ មល ឬ *ml***

## លំហាត់

ចូរប្រាប់ចំណុះជាមិល្លីលីត្រ

ក.



កំប៉ុងទឹកក្រូចមានចំណុះ .....មល ។

ខ.



ដបទឹកត្រីមានចំណុះ .....មល ។

គ.



ដបទឹកស៊ីអ៊ីវមានចំណុះ .....មល ។

ឃ.



ដបទឹកខ្មៅមានចំណុះ .....មល ។

## ការប្រៀបធៀបចំណុះ

**ក**




សុខាមានទឹក 2 ល ។ រីឯសុធាមានទឹក 1 ល ។
ដូចនេះសុខាមានទឹកច្រើនជាងសុធា 1 ល ។

**ខ**




នារីមានទឹកក្រូច 200 មល ។ រីឯបូរ៉ាមានទឹកក្រូច 350 មល ។ ដូចនេះនារីមានទឹកក្រូចតិចជាងបូរ៉ា 150 មល ។

## លំហាត់

ចូរប្រៀបធៀបចំណុះ




រូបក មានចំណុះ .......... តិចជាងរូបខ ។




រូបក មានទឹក .......... តិចជាងរូបខ ។




រូបក មានចំណុះ .......... តិចជាងរូបខ ។




រូបក មានចំណុះ .......... ច្រើនជាងរូបខ ។

# ទំនាក់ទំនងរវាងលីត្រនិងមិល្លីលីត្រ




**1 លី = 1 000 មលី ឬ 1 $\ell$ = 1 000 $m\ell$**

ក. 3 លី = ……… មលី?

3 លី = 1 លី + 1 លី + 1 លី = 1 000 មលី + 1 000 មលី + 1 000 មលី

3 លី = 3 000 មលី

ខ. 2 000 មលី = ……… លី?

2 000 មលី = 1 000 មលី + 1 000 មលី = 1 លី + 1 លី

2 000 មលី = 2 លី

## លំហាត់

ចូរបំពេញ ☐

ក. 5 លី = ☐ មលី

ខ. 10 លី = ☐ មលី

គ. 3 000 មលី = ☐ លី

ឃ. 4 000 មលី = ☐ លី

ង. 10 000 មលី = ☐ លី



# 8 ពេលវេលា

## ម៉ោងនិងនាទី

ទ្រនិចខ្លីជាទ្រនិចម៉ោង ដើរបាន 1 ប្រឡោះក្រិតធំស្មើនឹង 1 ម៉ោង ។
ទ្រនិចវែងជាទ្រនិចនាទី ដើរបាន 1 ប្រឡោះក្រិតធំស្មើនឹង 5 នាទី ។
ទ្រនិចវែងជាទ្រនិចនាទី ដើរបាន 1 ប្រឡោះក្រិតតូចស្មើនឹង 1 នាទី ។
មួយម៉ោងស្មើនឹង 60 នាទី ។




ម៉ោង 6 និង 10 នាទី




ម៉ោង 11 និង 45 នាទី




ម៉ោង 10 និង 38 នាទី




ម៉ោង 8 និង 7 នាទី

## លំហាត់

1. ចូរប្រាប់ម៉ោងតាមរូបនាឡិកា

ក. 

............

ខ. 

............

គ. 

............

ឃ. 

............

ង. 

............

ច. 

............

2. ចូរគូសទ្រនិចនាទីឱ្យត្រូវម៉ោងខាងក្រោម

ក. 

ម៉ោង 5 និង 15 នាទី

ខ. 

ម៉ោង 12 និង 34 នាទី

គ. 

ម៉ោង 3 និង 47 នាទី

3. ចូរគូសភ្ជាប់

| | |
|---|---|
| ក. 4:12 | ម៉ោង 2 និង 45 នាទី |
| ខ. 11:50 | ម៉ោង 4 និង 12 នាទី |
| គ. 2:45 | ម៉ោង 3 និង 8 នាទី |
| ឃ. 3:08 | ម៉ោង 11 និង 50 នាទី |

# ការអាននិងសរសេរម៉ោង




អានថាម៉ោង 10 និង 15 នាទី ឬ

ម៉ោង 10 និង 15 នាទីព្រឹក ។

យើងសរសេរ 10 : 15




អានថាម៉ោង 3 និង 8 នាទី ឬ

ម៉ោង 3 និង 8 នាទីព្រឹក ។

យើងសរសេរ 3 : 08




អានថាម៉ោង 4 និង 42 នាទី ឬ

ម៉ោង 4 និង 42 នាទីល្ងាច ឬ

ម៉ោង 16 និង 42 នាទី ។

យើងសរសេរ 4 : 42 ឬ 16 : 42




អានថាម៉ោង 8 និង 5 នាទី ឬ

ម៉ោង 8 និង 5 នាទីយប់ ឬ

ម៉ោង 20 និង 5 នាទី ។

យើងសរសេរ 8 : 05 ឬ 20 : 05

## លំហាត់

1. ចូរបំពេញពាក្យអាននិងសរសេរម៉ោង

ក. 


អានថាម៉ោង ..................

សរសេរ ......................

ខ. 


អានថាម៉ោង ..................

សរសេរ ......................

គ. 


អានថាម៉ោង ..................

សរសេរ ......................

ឃ. 


អានថាម៉ោង ..................

សរសេរ ......................

2. ចូរសរសេរម៉ោង

ក. ព្រឹក



............

ខ. ល្ងាច



............

គ. យប់



............

# ការអានតារាងពេលវេលា




| រថយន្ត | ទិសដៅ | ម៉ោងចេញដំណើរ | ម៉ោងទៅដល់ |
|---|---|---|---|
| 1 | ភ្នំពេញ - បាត់ដំបង | 06 : 20 | 11 : 30 |
| 2 | ភ្នំពេញ - ប៉ោយប៉ែត | 07 : 15 | 16 : 25 |
| 3 | ភ្នំពេញ - សៀមរាប | 07 : 45 | 13 : 15 |

តារាងពេលវេលាខាងលើអានដូចតទៅ

រថយន្តទី 1 ធ្វើដំណើរពីភ្នំពេញទៅបាត់ដំបង ។ រថយន្តនេះចេញដំណើរនៅម៉ោង 6 និង 20 នាទីហើយទៅដល់បាត់ដំបងនៅម៉ោង 11 និង 30 នាទី ឬ ម៉ោង 11 កន្លះ ។

រថយន្តទី 2 ធ្វើដំណើរពីភ្នំពេញទៅប៉ោយប៉ែត ។ រថយន្តនេះចេញដំណើរនៅម៉ោង 7 និង 15 នាទីហើយទៅដល់ប៉ោយប៉ែតនៅម៉ោង 16 និង 25 នាទី ។

រថយន្តទី 3 ធ្វើដំណើរពីភ្នំពេញទៅសៀមរាប ។ រថយន្តនេះចេញដំណើរនៅម៉ោង 7 និង 45 នាទីហើយទៅដល់សៀមរាបនៅម៉ោង 13 និង 15 នាទី ។

## លំហាត់

1. ចូរអានតារាងពេលវេលា

| រថយន្ត | ទិសដៅ | ម៉ោងចេញដំណើរ | ម៉ោងទៅដល់ |
|---|---|---|---|
| 1 | សៀមរាប-ភ្នំពេញ | 08 : 00 | 13 : 20 |
| 2 | សៀមរាប-ប៉ោយប៉ែត | 09 : 30 | 13 : 45 |
| 3 | សៀមរាប-បាត់ដំបង | 11 : 45 | 14 : 10 |

2. ចូរអានកាលវិភាគសម្រាប់ថ្ងៃចន្ទ

កាលវិភាគប្រចាំសប្តាហ៍សម្រាប់ថ្នាក់ទី ១ ទី ២ និងទី ៣(ពេលព្រឹក)

| ម៉ោងសិក្សា | ចន្ទ | អង្គារ | ពុធ | ព្រហស្បតិ៍ | សុក្រ | សៅរ៍ |
|---|---|---|---|---|---|---|
| 06:55-07:10 | គោរពទង់ជាតិ | | | | | |
| 07:10-07:50 | អប់រំកាយ និង សុខភាព | ភាសាខ្មែរ | ភាសាខ្មែរ | បំប៉នបន្ថែម និង អប់រំបំណិនជីវិតតាមមូលដ្ឋាន | អប់រំកាយ និង សុខភាព | ភាសាខ្មែរ |
| 07:50-08:30 | ភាសាខ្មែរ | ភាសាខ្មែរ | ភាសាខ្មែរ | | ភាសាខ្មែរ | ភាសាខ្មែរ |
| 08:30-08:45 | ចេញលេង | | | | ចេញលេង | |
| 08:45-09:25 | គណិតវិទ្យា | គណិតវិទ្យា | គណិតវិទ្យា | | គណិតវិទ្យា | គណិតវិទ្យា |
| 09:25-09:40 | ចេញលេង | | | | ចេញលេង | |
| 09:40-10:20 | ភាសាខ្មែរ | គណិតវិទ្យា | ភាសាខ្មែរ | | ភាសាខ្មែរ | គណិតវិទ្យា |
| 10:20-11:00 | ភាសាខ្មែរ | វិ. សាស្ត្រ-សិក្សាសង្គម | វិ. សាស្ត្រ-សិក្សាសង្គម | | វិ. សាស្ត្រ-សិក្សាសង្គម | ភាសាខ្មែរ |

# 9 វិធីគុណ

## ការបូកនិងការគុណ






$6 + 6 + 6 = 18$

ផ្លែត្របែកមាន 6 បីដង $\quad 6 \times 3 = 18$




ដូចនេះ ផ្លែត្របែកទាំងអស់មានចំនួនដប់ប្រាំបីផ្លែ ។






នំមាន 7 បួនដង

$7 + 7 + 7 + 7 = 28$

$7 \times 4 = 28$

**ការគុណគឺជាការបូកចំនួនដដែលៗច្រើនដង ។**

# លំហាត់

1. ចូរបំពេញចំនួនក្នុង ☐

ក.



$6 + 6 + 6 + 6 + 6 =$ ☐ ឬ $6 \times$ ☐ $=$ ☐

ខ.



$7 + 7 + 7 + 7 + 7 + 7 + 7 =$ ☐ ឬ $7 \times$ ☐ $=$ ☐

គ.




$8 + 8 + 8 + 8 + 8 + 8 + 8 + 8 =$ ☐ ឬ ☐ $\times$ ☐ $=$ ☐

ឃ.




$9 + 9 + 9 + 9 + 9 + 9 + 9 + 9 =$ ☐ ឬ ☐ $\times$ ☐ $=$ ☐

2. ចូរបំពេញចំនួនក្នុង ☐

$10 + 10 + 10 =$ ☐ ឬ $10 \times$ ☐ $=$ ☐

$10 + 10 + 10 + 10 =$ ☐ ឬ $10 \times$ ☐ $=$ ☐

$10 + 10 + 10 + 10 + 10 =$ ☐ ឬ $10 \times$ ☐ $=$ ☐

$10 + 10 + 10 + 10 + 10 + 10 =$ ☐ ឬ $10 \times$ ☐ $=$ ☐

# ការគុណដែលតួនីមួយៗមានលេខមួយខ្ទង់

## ក. ការគុណនឹង 6



$6 \times 1 = 6$



$6 \times 2 = 12$



$6 \times 3 = 18$



$6 \times 4 = 24$



$6 \times 5 = 30$

$6 \times 1 = 6$
$6 \times 2 = 12$
$6 \times 3 = 18$
$6 \times 4 = 24$
$6 \times 5 = 30$
$6 \times 6 = 36$
$6 \times 7 = 42$
$6 \times 8 = 48$
$6 \times 9 = 54$
$6 \times 10 = 60$

## ខ. ការគុណនឹង 7



$7 \times 1 = 7$



$7 \times 2 = 14$



$7 \times 3 = 21$



$7 \times 4 = 28$



$7 \times 5 = 35$

$7 \times 1 = 7$
$7 \times 2 = 14$
$7 \times 3 = 21$
$7 \times 4 = 28$
$7 \times 5 = 35$
$7 \times 6 = 42$
$7 \times 7 = 49$
$7 \times 8 = 56$
$7 \times 9 = 63$
$7 \times 10 = 70$

## គ. ការគុណនឹង 8



$8 \times 1 = 8$



$8 \times 2 = 16$



$8 \times 3 = 24$



$8 \times 4 = 32$



$8 \times 5 = 40$

| |
|---|
| $8 \times 1 = 8$ |
| $8 \times 2 = 16$ |
| $8 \times 3 = 24$ |
| $8 \times 4 = 32$ |
| $8 \times 5 = 40$ |
| $8 \times 6 = 48$ |
| $8 \times 7 = 56$ |
| $8 \times 8 = 64$ |
| $8 \times 9 = 72$ |
| $8 \times 10 = 80$ |

## ឃ. ការគុណនឹង 9



$9 \times 1 = 9$



$9 \times 2 = 18$



$9 \times 3 = 27$



$9 \times 4 = 36$



$9 \times 5 = 45$

| |
|---|
| $9 \times 1 = 9$ |
| $9 \times 2 = 18$ |
| $9 \times 3 = 27$ |
| $9 \times 4 = 36$ |
| $9 \times 5 = 45$ |
| $9 \times 6 = 54$ |
| $9 \times 7 = 63$ |
| $9 \times 8 = 72$ |
| $9 \times 9 = 81$ |
| $9 \times 10 = 90$ |

# តារាងមេគុណ 6 ; 7 ; 8 ; 9 និង 10

| × | 6 | 7 | 8 | 9 | 10 |
|---|---|---|---|---|---|
| 1 | 6 | 7 | 8 | 9 | 10 |
| 2 | 12 | 14 | 16 | 18 | 20 |
| 3 | 18 | 21 | 24 | 27 | 30 |
| 4 | 24 | 28 | 32 | 36 | 40 |
| 5 | 30 | 35 | 40 | 45 | 50 |
| 6 | 36 | 42 | 48 | 54 | 60 |
| 7 | 42 | 49 | 56 | 63 | 70 |
| 8 | 48 | 56 | 64 | 72 | 80 |
| 9 | 54 | 63 | 72 | 81 | 90 |
| 10 | 60 | 70 | 80 | 90 | 100 |




ដូចនេះ  គូចម្លើយដែលមានផលគុណស្មើគ្នា ។

ក. $6 \times 4$ ; $8 \times 3$ → 24

ខ. $6 \times 6$ ; $9 \times 4$ → 36

គ. $6 \times 5$ ; $10 \times 3$ → 30

ឃ. $8 \times 5$ ; $10 \times 4$ → 40

ង. $7 \times 6$ ; $6 \times 7$ → 42

ច. $8 \times 9$ ; $9 \times 8$ → 72

ចូររកគូចម្លើយដែលមានផលគុណស្មើគ្នាដូចខាងក្រោម

ក. … × … ; … × … → 21

ខ. … × … ; … × … → 28

## លំហាត់

1. ចូរបំពេញផលគុណក្នុង $\square$

ក.




ខ. $6 \times 7 = \square$ គ. $6 \times 9 = \square$ ឃ. $6 \times 8 = \square$

ង. $7 \times 9 = \square$ ច. $7 \times 10 = \square$ ឆ. $8 \times 9 = \square$

ជ. $8 \times 10 = \square$ ឈ. $9 \times 10 = \square$ ញ. $10 \times 4 = \square$

2. ចូរបំពេញចំនួនក្នុង $\square$

ក. $6 \times \square = 18$ ខ. $10 \times \square = 20$ គ. $10 \times \square = 60$

ឃ. $6 \times \square = 36$ ង. $10 \times \square = 40$ ច. $10 \times \square = 50$

ឆ. $6 \times \square = 54$ ជ. $10 \times \square = 80$ ឈ. $10 \times \square = 70$

ញ. $6 \times \square = 30$ ដ. $10 \times \square = 100$ ឋ. $10 \times \square = 90$

3. ចូរបំពេញចំនួនក្នុង $\square$

ក. $6 \times 5 = 5 \times \square$ ខ. $3 \times 7 = 7 \times \square$ គ. $9 \times 6 = 6 \times \square$

ឃ. $6 \times 7 = \square \times 6$ ង. $8 \times 4 = 4 \times \square$ ច. $9 \times 8 = \square \times 9$

4. ចូរបំពេញផលគុណក្នុងតារាង

| តួគុណទី១ | 10 | 9 | 8 | 7 | 6 | 5 | 4 | 3 | 2 | 0 |
|---|---|---|---|---|---|---|---|---|---|---|
| តួគុណទី២ | 5 | 6 | 4 | 9 | 7 | 8 | 7 | 9 | 10 | 8 |
| ផលគុណ | 50 | | | | | | | | | |

## ចំណោទ

1. ពោតមួយចង្កោមមាន 6 ផ្លែ ។
តើពោត 4 ចង្កោមមានប៉ុន្មានផ្លែ?



| ប្រមាណវិធី | របៀបឆ្លើយ |
|---|---|
| $\begin{array}{r} \times\ 6 \\ 4 \\ \hline 24 \end{array}$ | ចំនួនផ្លែពោត 4 ចង្កោម<br>$6 \times 4 = 24$ ផ្លែ<br>ឆ្លើយថា ពោត 4 ចង្កោមមាន 24 ផ្លែ ។ |

2. រទេះមួយដឹកអង្ករបានចំនួន 7 បាវ ។ តើរទេះ 8 ដឹកអង្ករបានប៉ុន្មានបាវ?

3. ពូឆាំដាំកូនឈើ 8 ជួរ ដែលក្នុងមួយជួរមានកូនឈើ 9 ដើម ។
តើគាត់ដាំកូនឈើទាំងអស់បានប៉ុន្មានដើម?

4. បងស្រីរតនាត្បាញក្រមាក្នុងមួយថ្ងៃបានចំនួន 9 ។
តើក្នុងមួយសប្តាហ៍គាត់ត្បាញក្រមាបានប៉ុន្មាន?



5. សិស្ស 3 នាក់ទិញសៀវភៅសរសេរម្នាក់ចំនួន 8 ក្បាល ។
តើសៀវភៅទាំងអស់ដែលសិស្សទិញមានចំនួនប៉ុន្មានក្បាល?

6. កុមារ 4 នាក់ចែកស្ករគ្រាប់គ្នាបានម្នាក់ៗ 7 គ្រាប់ ។
តើស្ករគ្រាប់ទាំងអស់មានចំនួនប៉ុន្មានគ្រាប់?

# ការគុណចំនួនមានលេខ 1 ខ្ទង់នឹងចំនួនមានលេខសូន្យខាងចុង

ក. ចន្ទាមានដូង 3 ធ្លាយដែលក្នុងមួយធ្លាយមាន 10 ផ្លែ ។
តើដូងទាំងអស់មានប៉ុន្មានផ្លែ?



$10 \times 3 = \square$

$10 \times 3 = 10 + 10 + 10 = 30$

ឬ

$$\begin{array}{r} 10 \\ \times \quad 3 \\ \hline 30 \end{array}$$

$3 \times 1 = 3$

ដូចនេះ ដូងទាំងអស់មាន 30 ផ្លែ ។




ខ. $200 \times 4 = \square$

$200 + 200 + 200 + 200 = 800$ ឬ

$$\begin{array}{r} 200 \\ \times \quad 4 \\ \hline 800 \end{array}$$

$2 \times 4 = 8$

ដូចនេះ $200 \times 4 = 800$

**ដើម្បីគុណមួយចំនួននឹង 10 ; 20 ; 30 ; 400 ; 200 ; ... ; 900 យើងអាចគុណចំនួននោះនឹង 1 ; 2 ; 3 ; 4 ; ... ; 9 រួចថែមសូន្យតាមចំនួនសូន្យដែលមាននៅតួគុណ ។**

## លំហាត់

1. ចូរសង្កេតលំនាំគំរូរួចបំពេញចំនួនក្នុង $\square$

ក. $1 \times 5 = 5$

$10 \times 5 = \square$

$100 \times 5 = \square$

ខ. $3 \times 3 = \square$

$30 \times 3 = \square$

$300 \times 3 = \square$



គ. $4 \times 2 = \square$

$40 \times 2 = \square$

$400 \times 2 = \square$

ឃ. $6 \times 5 = \square$

$60 \times 5 = \square$

$600 \times 5 = \square$

2. មុធាគណនា

ក. $70 \times 4 = 280$ ខ. $60 \times 4 = \square$ គ. $40 \times 7 = \square$

ឃ. $40 \times 6 = \square$ ង. $30 \times 7 = \square$ ច. $20 \times 8 = \square$

ឆ. $100 \times 7 = \square$ ជ. $500 \times 9 = \square$ ឈ. $700 \times 3 = \square$

3. ចូរគណនាផលគុណ

ក. $\begin{array}{r} 10 \\ \times \quad 9 \\ \hline \end{array}$ ខ. $\begin{array}{r} 30 \\ \times \quad 6 \\ \hline \end{array}$ គ. $\begin{array}{r} 40 \\ \times \quad 8 \\ \hline \end{array}$

ឃ. $\begin{array}{r} 500 \\ \times \quad 7 \\ \hline \end{array}$ ង. $\begin{array}{r} 600 \\ \times \quad 6 \\ \hline \end{array}$ ច. $\begin{array}{r} 800 \\ \times \quad 7 \\ \hline \end{array}$

## ចំណោទ

1. បងស្រីខ្ញុំរៀបផ្លែក្រូច 2 កញ្ច្រែង ។ មួយកញ្ច្រែងគាត់ដាក់ក្រូច 30 ផ្លែ ។ តើពីរកញ្ច្រែងគាត់ដាក់ក្រូចចំនួនប៉ុន្មានផ្លែ?
2. អំបោះមួយថង់មានចំនួន 20 ដុំ ។ តើអំបោះ 5 ថង់មានប៉ុន្មានដុំ?
3. ខ្មៅដៃមួយប្រអប់មាន 10 ដើម ។ តើខ្មៅដៃ 7 ប្រអប់មានប៉ុន្មានដើម?

## ការគុណចំនួនមានលេខ 2 ខ្ទង់នឹង 1 ខ្ទង់មានត្រាទុក

ស្វាយមួយឡូមាន 12 ផ្លែ ។

តើស្វាយ 6 ឡូមានប៉ុន្មានផ្លែ?



$12 \times 6 = \square$




$$\begin{array}{r} {}^{1}\\ 12 \\ \times \quad 6 \\ \hline 72 \end{array}$$

6 គុណនឹង 2 ស្មើនឹង 12 ។

សរសេរលេខ 2 ត្រាទុក 1 ។

6 គុណនឹង 1 ស្មើនឹង 6 រួចបូកនឹង 1 ស្មើនឹង 7 ។ សរសេរលេខ 7 ។

ដូចនេះ ស្វាយ 6 ឡូមាន 72 ផ្លែ ។

## ការបង្កើតចំណោទ

$18 \times 7 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខដូចខាងក្រោម

> សិស្ស 7 នាក់ដាំផ្កាក្នុងម្នាក់ៗបាន 18 ដើម ។
> តើសិស្សទាំង 7 នាក់ដាំផ្កាបានចំនួនប៉ុន្មានដើម?

## លំហាត់

1. ចូររកផលគុណតាមវិធីបូក

ក. $13 \times 3 = 13 + 13 + 13 = 39$ ខ. $42 \times 3 = \square + \square + \square = \square$

គ. $67 \times 4 = \square + \square + \square + \square = \square$ ឃ. $45 \times 2 = \square + \square = \square$

2. ចូរបំពេញផលគុណក្នុង $\square$

ក. $18 \times 3 = \square$ ខ. $20 \times 6 = \square$ គ. $42 \times 7 = \square$

ឃ. $84 \times 9 = \square$ ង. $75 \times 8 = \square$ ច. $67 \times 6 = \square$

3. ចូរគណនាផលគុណ

ក. $15 \times 3$ ខ. $29 \times 6$ គ. $58 \times 7$

ឃ. $63 \times 6$ ង. $85 \times 7$ ច. $88 \times 5$

## ចំណោទ

1. ពូអានដាំដើមចេកក្នុងមួយថ្ងៃបាន 6 ដើម ។ តើក្នុង 15 ថ្ងៃគាត់ដាំដើមចេកបានប៉ុន្មានដើម?
2. សិប្បកម្មមួយកន្លែងត្បាញក្រមាក្នុងមួយថ្ងៃបាន 35 ក្រមា ។ តើក្នុង 7 ថ្ងៃសិប្បកម្មនោះត្បាញក្រមាបានប៉ុន្មាន?
3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. $74 \times 6 = \square$ ខ. $37 \times 7 = \square$

## ការគុណចំនួនមានលេខ 3 ខ្ទង់នឹង 1 ខ្ទង់គ្មានត្រាទុក



កសិដ្ឋានចិញ្ចឹមទាមួយកន្លែងប្រមូលស៊ុតទាបាន 203 គ្រាប់ក្នុងមួយថ្ងៃ ។

តើក្នុងរយៈពេល 3 ថ្ងៃម្ចាស់កសិដ្ឋាននោះប្រមូលស៊ុតទាបានប៉ុន្មានគ្រាប់?

$203 \times 3 = \square$

$$\begin{array}{r} 203 \\ \times \quad 3 \\ \hline 609 \end{array}$$

$3 \times 3 = 9$

$3 \times 0 = 0$

$3 \times 2 = 6$

▪ ដំបូងគុណនឹងខ្ទង់រាយ ។

▪ បន្ទាប់ គុណនឹងខ្ទង់ដប់ ។

▪ ចុងបញ្ចប់ គុណខ្ទង់រយ ។



យើងបាន $203 \times 3 = 609$ ។

ដូចនេះ ក្នុងរយៈពេល 3 ថ្ងៃ ម្ចាស់កសិដ្ឋានប្រមូលស៊ុតទាបាន 609 គ្រាប់ ។

## ការបង្កើតចំណោទ

$132 \times 3 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខដូចខាងក្រោម

> សិស្សចុះឈ្មោះចូលរៀនថ្នាក់ទី ១ ក្នុងមួយថ្ងៃមានចំនួន 132 នាក់ ។
> តើក្នុងរយៈពេល 3 ថ្ងៃសាលារៀនទទួលសិស្សបានប៉ុន្មាននាក់?

## លំហាត់

1. ចូររកផលគុណតាមវិធីបូក

ក. $213 \times 2 = 213 + 213 = 426$ ខ. $320 \times 3 = \square + \square + \square = \square$

គ. $322 \times 3 = \square + \square + \square = \square$ ឃ. $142 \times 2 = \square + \square = \square$

2. ចូរបំពេញផលគុណក្នុង $\square$

ក. $101 \times 9 = \square$ ខ. $222 \times 4 = \square$ គ. $212 \times 3 = \square$

ឃ. $403 \times 2 = \square$ ង. $300 \times 3 = \square$ ច. $110 \times 6 = \square$

3. ចូរគណនាផលគុណ

ក. $210 \times 3$ ខ. $112 \times 4$ គ. $132 \times 3$

ឃ. $421 \times 2$ ង. $230 \times 3$ ច. $110 \times 7$

## ចំណោទ

1. រថយន្តមួយគ្រឿងដឹកផ្លែចេកបាន 123 ស្ទង ។ តើរថយន្ត 3 គ្រឿងដឹកផ្លែចេកបានប៉ុន្មានស្ទង?
2. ចម្ការកៅស៊ូមួយកន្លែងមានដើមកៅស៊ូក្នុងមួយជួរ 411 ដើម ។ តើក្នុង 2 ជួរមានដើមកៅស៊ូប៉ុន្មានដើម?
3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. $222 \times 4 = \square$ ខ. $133 \times 3 = \square$

## ការគុណចំនួនមានលេខ 3 ខ្ទង់នឹង 1 ខ្ទង់មានត្រាទុក

សិប្បកម្មឡឥដ្ឋមួយកន្លែងផលិតឥដ្ឋបាន 213 ដុំក្នុងមួយថ្ងៃ ។
តើរយៈពេល 7 ថ្ងៃសិប្បកម្មនោះផលិតឥដ្ឋបានប៉ុន្មានដុំ?

$213 \times 7 = \square$

$$\begin{array}{r} \scriptstyle 2 \\ 213 \\ \times \quad 7 \\ \hline 1\,491 \end{array}$$

7 គុណនឹង 3 ស្មើនឹង 21 ។ សរសេរលេខ 1 ត្រាទុក 2 ។
7 គុណនឹង 1 ស្មើនឹង 7 រួចបូកនឹង 2 ស្មើនឹង 9 ។
សរសេរលេខ 9 ។
7 គុណនឹង 2 ស្មើនឹង 14 ។ សរសេរលេខ 14 ។

យើងបាន $213 \times 7 = 1\,491$ ។

ដូចនេះ ក្នុងរយៈពេល 7 ថ្ងៃសិប្បកម្មនោះផលិតឥដ្ឋបាន 1 491 ដុំ ។

## ការបង្កើតចំណោទ

$650 \times 8 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខដូចខាងក្រោម

សុខាទិញប៊ិក 8 ដើម ។ ក្នុងមួយដើមថ្លៃ 650 រៀល ។
តើសុខាត្រូវការប្រាក់ប៉ុន្មានរៀលដើម្បីឱ្យថ្លៃប៊ិក?

## លំហាត់

1. ចូរគណនាផលគុណ

ក. $214 \times 4 = \square$

ខ. $205 \times 6 = \square$

គ. $578 \times 7 = \square$

ឃ. $483 \times 5 = \square$

ង. $724 \times 6 = \square$

ច. $279 \times 6 = \square$

ឆ. $807 \times 5 = \square$

ជ. $795 \times 4 = \square$

ឈ. $298 \times 9 = \square$

ញ. $398 \times 4 = \square$

ដ. $600 \times 6 = \square$

ឋ. $548 \times 7 = \square$

2. ចូរបំពេញផលគុណក្នុង $\square$

ក. $324 \times 3 = \square$

ខ. $526 \times 4 = \square$

គ. $821 \times 7 = \square$

ឃ. $378 \times 8 = \square$

ង. $546 \times 9 = \square$

ច. $421 \times 4 = \square$

ឆ. $452 \times 6 = \square$

ជ. $619 \times 6 = \square$

ឈ. $927 \times 8 = \square$

ញ. $806 \times 6 = \square$

## ចំណោទ

1. នៅថ្ងៃរុក្ខទិវាសិស្សម្នាក់ៗត្រូវដាំដើមឈើឱ្យបាន 6 ដើម ។ តើសិស្សចំនួន 125 នាក់ដាំដើមឈើបានប៉ុន្មានដើម?



2. បាវមួយដាក់បានផ្លែក្រូច 421 ផ្លែ ។ តើបាវ 8 ដាក់បានផ្លែក្រូចប៉ុន្មានផ្លែ?

3. រថយន្តមួយគ្រឿងដឹកល្ពៅបាន 560 ផ្លែ ។ តើរថយន្ត 7 គ្រឿងដឹកល្ពៅបានប៉ុន្មានផ្លែ?

4. នារីលក់ផ្កា 9 ទង ។ ក្នុងមួយទងនាងលក់ថ្លៃ 500 រៀល ។ តើនាងលក់ផ្កាបានប្រាក់ប៉ុន្មានរៀល?




5. ក្នុងសាលប្រជុំមួយមានកៅអី 9 ជួរ ។ គេដឹងថាក្នុងមួយជួរមានកៅអី 135 ។ តើនៅសាលប្រជុំនោះមានកៅអីទាំងអស់ចំនួនប៉ុន្មាន?

6. ម្ចាស់កសិដ្ឋានមួយកន្លែងចិញ្ចឹមជ្រូក 580 ក្បាល ។ ក្នុងមួយថ្ងៃជ្រូកមួយក្បាលស៊ីចំណី 2 គក ។ តើក្នុងមួយថ្ងៃគាត់ត្រូវការចំណីសម្រាប់ជ្រូកទាំងអស់ប៉ុន្មានគីឡូក្រាម?

7. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

**ក.** $320 \times 6 = \square$ **ខ.** $436 \times 7 = \square$

# 10 ធរណីមាត្រ

## ចតុកោណ ត្រីកោណ

ការេ




ចតុកោណ **កខគឃ** មានជ្រុងបួន :

ជ្រុង **កខ** = ជ្រុង **ខគ** = ជ្រុង**គឃ** = ជ្រុង**ឃក**

អង្កត់ **កគ** និង **ខឃ** ជាអង្កត់ទ្រូង ។

ចតុកោណកែង




ចតុកោណ **ចឆជឈ** មានជ្រុងបួន :

ជ្រុង **ចឆ** = ជ្រុង **ជឈ** ជាបណ្ដោយនិង

ជ្រុង **ចឈ** = ជ្រុង **ឆជ** ជាទទឹង ។

អង្កត់ **ចជ** និង **ឆឈ** ជាអង្កត់ទ្រូង ។

ត្រីកោណ




ត្រីកោណ **កខគ** មានជ្រុងបី :

ជ្រុង **កខ** កគ និង ជ្រុង **ខគ** ។

ចំណុច **ក** ជាកំពូលនៃត្រីកោណ ។

អង្កត់ **ខគ** ជាបាតនៃត្រីកោណ ។

អង្កត់ **កង** ជាកម្ពស់នៃត្រីកោណ ។

ចតុកោណជារូបធរណីមាត្រដែលមានជ្រុងបួន ។
ត្រីកោណជារូបធរណីមាត្រដែលមានជ្រុងបី ។

# លំហាត់

1. តើរូបណាមិនមែនជាចតុកោណនិងមិនមែនជាត្រីកោណ?

ក. 

ខ. 

គ. 

ឃ. 

ង. 

ច. 

2. ចូរឆ្លើយនឹងសំណួរ

ក. តើជ្រុងណាខ្លះជាបណ្ដោយចតុកោណកែង?

ខ. តើជ្រុងណាខ្លះជាទទឹងចតុកោណកែង?

គ. តើអង្កត់ណាខ្លះជាអង្កត់ទ្រូង ?




ឃ. តើចតុកោណ កខគឃ ជាអ្វី?

ង. តើអង្កត់ កខ ជាអ្វី?

ច. តើអង្កត់ កគ ជាអ្វី?




3. ចូរគូសវង់ចម្លើយដែលត្រឹមត្រូវ




តើអង្កត់ណា ជាកម្ពស់នៃត្រីកោណ?

ក. ចឆ ខ. ចឈ គ. ចជ ឃ. ឆជ

តើជ្រុងណា ជាបាតនៃត្រីកោណ?

ក. ឆឈ ខ. ឈជ គ. ឆជ ឃ. ចឆ

# ការសង់ត្រីកោណ

សង់ត្រីកោណ **កខគ** ដែលមានជ្រុង :

**កខ** = 5 សម   **កគ** = 4 សម   និង   **ខគ** = 3 សម ។






គូសអង្កត់ **កខ** ប្រវែង 5 សម ។




គូសខ្សែកោងចម្ងាយពីចំណុច ក 4 សម




គូសខ្សែកោងចម្ងាយពីចំណុច **ខ** 3 សម




គូសអង្កត់ **កគ** និង **ខគ** ។

# លំហាត់

ចូរសង់ត្រីកោណតាមការកំណត់ខាងក្រោម

**ក.** ជ្រុង កខ = 6 សម   ជ្រុង កគ = 4 សម   និង   ជ្រុង ខគ = 5 សម ។

**ខ.** ជ្រុង ចឆ = 5 សម   ជ្រុង ឆជ = 7 សម   និង   ជ្រុង ចជ = 4 សម ។

**គ.** ជ្រុងជឈនិងញឈ មានប្រវែងរៀងគ្នាតាមលំដាប់ 6 សម និង 5 សម ។ បាត ជញ មានប្រវែង 3 សម ។

## បរិមាត្រត្រីកោណ ការេ និងចតុកោណកែង

រស្មីរកប្រវែងជុំវិញរូបធរណីមាត្រដែលមានរាង ត្រីកោណ ការេ និង ចតុកោណកែង ។ តើនាងត្រូវធ្វើដូចម្តេច?




វាស់ប្រវែងជ្រុងទាំងបីនៃត្រីកោណ ។

ប្រវែងជុំវិញត្រីកោណ = 3 + 5 + 4

= ជ្រុង + ជ្រុង + ជ្រុង




វាស់ប្រវែងជ្រុងទាំងបួនរបស់ការេ ។

ប្រវែងជុំវិញការេ = 3+3+3+3

= 3×4

= ជ្រុង × 4




វាស់ប្រវែងជ្រុងទាំងបួនរបស់ចតុកោណកែង ។

ប្រវែងជុំវិញចតុកោណកែង

= 5+3+5+3 = (5+3) × 2

=(បណ្តោយ + ទទឹង) × 2

**ប្រវែងជុំវិញហៅថា បរិមាត្រ ។**

| | |
|---|---|
| **បរិមាត្រត្រីកោណ** | **= ជ្រុង + ជ្រុង + ជ្រុង** |
| **បរិមាត្រការេ** | **= ជ្រុង × 4** |
| **បរិមាត្រចតុកោណកែង** | **= (បណ្តោយ + ទទឹង) × 2** |

## លំហាត់

1. ចូរគណនាបរិមាត្រ

ក.




ខ.




គ.




ឃ.




2. ចូរវាស់ជ្រុងនៃរូបធរណីមាត្រ រួចរកបរិមាត្រ

ក.



ខ.



គ.



ឃ.



## ផ្ទៃក្រឡាការេ  ចតុកោណកែង

ស៊ីថា រកផ្ទៃរូបធរណីមាត្រដែលមានរាងជាការេ  ចតុកោណកែង ។ តើស៊ីថាធ្វើដូចម្តេច?

ដើម្បីរកផ្ទៃក្រឡាការេ ស៊ីថា ប្រើ  ជារូបតំណាងផ្ទៃក្រឡាដែលមានទំហំ 1 សង់ទីម៉ែត្រការេ ។







**រកផ្ទៃក្រឡារូបធរណីមាត្រមួយគឺជា ការរាប់ចំនួនឯកតាការេដែលមាននៅក្នុងនោះ ។**

## លំហាត់

ចូររកផ្ទៃក្រឡាចតុកោណកែងខាងក្រោម















# ការបង្កើតរូបធរណីមាត្រមានវិមាត្របី




## លំហាត់

1. តើរូបខាងក្រោមបង្កើតបានជាគូបដែរឬទេ?

ក



ខ



គ



2. ចូរសាកល្បងយករូបប្រអប់ដីស មកលា រួចបត់បញ្ចូលវិញ ។

# 11 វិធីចែក

## ការរកផលចែកដោយប្រើតារាងគុណ

| × | 6 | 7 | 8 | 9 |
|---|---|---|---|---|
| 1 | 6 | 7 | 8 | 9 |
| 2 | 12 | 14 | 16 | 18 |
| 3 | 18 | 21 | 24 | 27 |
| 4 | 24 | 28 | 32 | 36 |
| 5 | 30 | 35 | 40 | 45 |
| 6 | 36 | 42 | 48 | 54 |
| 7 | 42 | 49 | 56 | 63 |
| 8 | 48 | 56 | 64 | 72 |
| 9 | 54 | 63 | 72 | 81 |

$24 \div 8 = 3$

$54 \div 9 = 6$

$56 \div 7 = 8$




## លំហាត់

1. ចូររកផលចែក

ក. $35 \div 7 = \square$ ខ. $54 \div 6 = \square$ គ. $42 \div 6 = \square$

ឃ. $32 \div 8 = \square$ ង. $18 \div 6 = \square$ ច. $28 \div 7 = \square$

ឆ. $18 \div 9 = \square$ ជ. $45 \div 9 = \square$ ឈ. $36 \div 6 = \square$

2. ចូរបំពេញចំនួនក្នុង $\square$

ក. $72 \div \square = 8$ ខ. $63 \div \square = 9$ គ. $64 \div \square = 8$

ឃ. $81 \div \square = 9$ ង. $35 \div \square = 7$ ច. $48 \div \square = 6$

ឆ. $40 \div \square = 8$ ជ. $72 \div \square = 8$ ឈ. $49 \div \square = 7$

## ការចែកចំនួនមានលេខ 2 ខ្ទង់នឹង 1 ខ្ទង់គ្មានសំណល់

**ក.** $36 \div 6 = \square$



$$\begin{array}{r|l} 36 & 6 \\ -\,36 & 6 \\ \hline 0 & \end{array}$$




ដូចនេះ $36 \div 6 = 6$

**ខ.** $88 \div 8 = \square$



$$\begin{array}{r|l} 88 & 8 \\ -\,8 & 11 \\ \hline 08 & \\ -\,8 & \\ \hline 0 & \end{array}$$




ដូចនេះ $88 \div 8 = 11$

## ការបង្កើតចំណោទ

$35 \div 5 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

> ម្ដាយវណ្ណាទិញមង្ឃុត 35 ផ្លែ ។ គាត់រៀបដាក់ក្នុងមួយចាន 5 ផ្លែស្មើៗគ្នា ។ តើគាត់រៀបបានប៉ុន្មានចាន?

## លំហាត់

1. ចូរធ្វើប្រមាណវិធីចែក

ក. $30 \div 2$

ខ. $48 \div 4$

គ. $55 \div 5$

ឃ. $84 \div 4$

ង. $90 \div 6$

ច. $84 \div 7$

ឆ. $64 \div 8$

ជ. $72 \div 9$

ឈ. $49 \div 7$

2. ចូរបំពេញផលចែកក្នុង ☐

ក. $14 \div 7 =$ ☐

ខ. $18 \div 6 =$ ☐

គ. $77 \div 7 =$ ☐

ឃ. $40 \div 8 =$ ☐

ង. $27 \div 9 =$ ☐

ច. $81 \div 9 =$ ☐

ឆ. $56 \div 8 =$ ☐

ជ. $90 \div 6 =$ ☐

3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. $27 \div 9 =$ ☐

ខ. $42 \div 6 =$ ☐

## ចំណោទ

គេមានសៀវភៅ 72 ក្បាល ។ គេចែកឱ្យក្មេង 9 នាក់ស្មើៗគ្នា ។
តើម្នាក់ៗទទួលបានសៀវភៅប៉ុន្មានក្បាល?

| ប្រមាណវិធី | របៀបឆ្លើយ |
| --- | --- |
| $\begin{array}{r\|l} 72 & 9 \\ \hline -72 & 8 \\ 0 & \end{array}$ | រកចំនួនសៀវភៅដែលក្មេងម្នាក់ៗទទួលបាន<br>$72 \div 9 = \boxed{8}$<br>ឆ្លើយថា ៖ ក្មេងម្នាក់ៗទទួលបានសៀវភៅចំនួន $\boxed{8 \text{ ក្បាល}}$ |

1. នៅក្នុងថ្នាក់រៀនមួយមានសិស្សសរុប 49 នាក់ ។ អ្នកគ្រូចែកសិស្សនោះជា 7 ក្រុមស្មើៗគ្នា ។ តើសិស្សមួយក្រុមៗមានចំនួនប៉ុន្មាននាក់?

2. គេចង់ដាំផ្កា 84 ដើមនៅក្នុងសួនសាលារៀនមួយ ។ គេដាំផ្កានោះជា 6 ជួរ ។ តើក្នុងមួយជួរៗមានផ្កាប៉ុន្មានដើម?

3. បញ្ញាទិញក្រូចពីរស្បោង ។ ក្នុងមួយស្បោងមានក្រូច 24 ផ្លែ ។ នាងយកក្រូចទាំងនោះទៅរៀបដាក់ក្នុងមួយចាន 8 ផ្លែ ។

   ក. តើក្រូចទាំងអស់មានចំនួនប៉ុន្មានផ្លែ?

   ខ. តើបញ្ញារៀបក្រូចបានប៉ុន្មានចាន?



## ការចែកចំនួនមានលេខ 2 ខ្ទង់នឹង 1 ខ្ទង់មានសំណល់

ក. $42 \div 5 = \square$



$$\begin{array}{r|l} 42 & 5 \\ -\ 40 & 8 \\ \hline 2 & \end{array}$$




ដូចនេះ $42 \div 5 = 8$ សំណល់ 2 ។

ខ. $63 \div 6 = \square$



$$\begin{array}{r|l} 63 & 6 \\ -\ 6 & 10 \\ \hline 03 & \\ -\ 0 & \\ \hline 3 & \end{array}$$

ដូចនេះ $63 \div 6 = 10$ សំណល់ 3 ។

## ការបង្កើតចំណោទ

$50 \div 8 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

> លីដាមានខ្មៅដៃ 50 ដើម ។ នាងចងខ្មៅដៃក្នុងមួយបាច់ 8 ដើម ។
> តើនាងចងខ្មៅដៃបានប៉ុន្មានបាច់?

## លំហាត់

1. ចូរធ្វើប្រមាណវិធីចែក

ក.




ខ.




គ.




ឃ.




ង.




ច.




2. ចូរបំពេញផលចែកក្នុង ☐

ក. $72 \div 7 =$ ☐ ខ. $42 \div 5 =$ ☐ គ. $53 \div 6 =$ ☐

ឃ. $47 \div 7 =$ ☐ ង. $89 \div 8 =$ ☐ ច. $54 \div 8 =$ ☐

ឆ. $35 \div 6 =$ ☐ ជ. $62 \div 8 =$ ☐ ឈ. $88 \div 7 =$ ☐

ញ. $51 \div 6 =$ ☐ ដ. $69 \div 6 =$ ☐ ឋ. $44 \div 5 =$ ☐

ឌ. $75 \div 9 =$ ☐ ឍ. $90 \div 8 =$ ☐ ណ. $53 \div 5 =$ ☐

## ការចែកចំនួនមានលេខ 3 ខ្ទង់នឹង 1 ខ្ទង់គ្មានសំណល់

$324 \div 3 = \square$



```
  324 | 3
- 3   |----
  --- | 108
  02
-  0
  ---
   24
-  24
  ---
    0
```

ដូចនេះ $324 \div 3 = \boxed{108}$



## ការបង្កើតចំណោទ

$100 \div 5 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

> ម្តាយបូណាមានចង្កឹះ 100 ដើម ។ គាត់ចែកឱ្យក្មេង 5 នាក់ ។
> តើក្មេងម្នាក់ៗបានចង្កឹះប៉ុន្មានដើម?

# លំហាត់

1. ចូរធ្វើប្រមាណវិធីចែក

ក.




ខ.




គ.




ឃ.




ង.




ច.




2. ចូរបំពេញផលចែកក្នុង ☐

| | | |
|---|---|---|
| ក. $832 \div 6 =$ ☐ | ខ. $480 \div 6 =$ ☐ | គ. $364 \div 7 =$ ☐ |
| ឃ. $329 \div 7 =$ ☐ | ង. $328 \div 8 =$ ☐ | ច. $504 \div 8 =$ ☐ |
| ឆ. $632 \div 8 =$ ☐ | ជ. $872 \div 8 =$ ☐ | ឈ. $900 \div 9 =$ ☐ |
| ញ. $324 \div 9 =$ ☐ | ដ. $800 \div 8 =$ ☐ | ឋ. $567 \div 7 =$ ☐ |

3. ចូរបង្កើតចំណោទដោយប្រើល្បះលេខដូចខាងក្រោម

ក. $288 \div 6 =$ ☐ ខ. $133 \div 7 =$ ☐

## ការចែកចំនួនមានលេខ 3 ខ្ទង់នឹង 1 ខ្ទង់មានសំណល់

$523 \div 4 = \square$



```
  523 | 4
- 4   |----
  --  | 130
  12
- 12
  --
   03
-   0
   --
    3
```

ដូចនេះ $523 \div 4 = \boxed{130}$ សំណល់ 3

## ការបង្កើតចំណោទ

$650 \div 6 = \square$

យើងអាចបង្កើតចំណោទដែលទាក់ទងនឹងល្បះលេខនេះដូចខាងក្រោម

> គេយកអង្ករ 650 គក ទៅចែកឱ្យ 6 គ្រួសារ ។
> តើគ្រួសារនីមួយៗបានទទួលអង្ករប៉ុន្មានគីឡូក្រាម?

## លំហាត់

1. ចូរធ្វើប្រមាណវិធី

ក.




ខ.




គ.




ឃ.




ង.




ច.




2. ចូរបំពេញផលចែកក្នុង ☐

ក. $313 \div 6 =$ ☐ ខ. $226 \div 7 =$ ☐ គ. $203 \div 8 =$ ☐

ឃ. $359 \div 7 =$ ☐ ង. $495 \div 6 =$ ☐ ច. $360 \div 8 =$ ☐

ឆ. $325 \div 8 =$ ☐ ជ. $306 \div 7 =$ ☐ ឈ. $408 \div 8 =$ ☐

ញ. $902 \div 8 =$ ☐ ដ. $802 \div 9 =$ ☐ ឋ. $567 \div 9 =$ ☐

3. ចូរបង្កើតចំណោទដោយប្រើល្បះលេខខាងក្រោម

ក. $312 \div 7 =$ ☐ ខ. $115 \div 8 =$ ☐

## ចំណោទ

ក. ម្ដាយសុធាចែកប្រាក់ 800 រៀលឱ្យកូន 6 នាក់ស្មើៗគ្នា ។ តើកូនម្នាក់ៗទទួលបានប្រាក់ប៉ុន្មានរៀល?

ខ. កញ្ញាយកប្រាក់ 700 រៀលទៅទិញទឹកអំពៅ ។ ទឹកអំពៅមួយថង់ថ្លៃ 300 រៀល ។ តើនាងទិញទឹកអំពៅបានប៉ុន្មានថង់?

# ការផ្ទៀងផ្ទាត់ផលចែក

$316 \div 6 = \square$

**ប្រមាណវិធី**

$$\begin{array}{r|l} 316 & 6 \\ -\ 30 & \overline{52} \\ \hline 16 & \\ -\ 12 & \\ \hline 4 & \end{array}$$

$316 \div 6 = 52$ សំណល់ 4

**ផ្ទៀងផ្ទាត់ផលចែក**

$$\begin{array}{r} \overset{1}{5}2 \\ \times\quad 6 \\ \hline 312 \end{array}$$

$312 + 4 = 316$

**ដើម្បីផ្ទៀងផ្ទាត់ផលចែក គឺយកផលចែក × តួចែក + សំណល់ = តំណាំងចែក**

# លំហាត់

ចូរផ្ទៀងផ្ទាត់ផលចែក

ក. $598 \div 3 = 199$ សំណល់ 1

ខ. $478 \div 6 = 79$ សំណល់ 4

គ. $624 \div 7 = 89$ សំណល់ 1

ឃ. $800 \div 8 = 100$

ង. $715 \div 9 = 79$ សំណល់ 4

ច. $643 \div 7 = 91$ សំណល់ 6

## មួយចំនួនចែកដាច់នឹងមួយចំនួនទៀត

| | | |
|---|---|---|
| $6 \div 2 = 3$ | សំណល់ 0 | យើងថា 6 ចែកដាច់នឹង 2 ។ |
| $7 \div 2 = 3$ | សំណល់ 1 | យើងថា 7 ចែកមិនដាច់នឹង 2 ។ |
| $12 \div 4 = 3$ | សំណល់ 0 | យើងថា 12 ចែកដាច់នឹង 4 ។ |
| $16 \div 4 = 4$ | សំណល់ 0 | យើងថា 16 ចែកដាច់នឹង 4 ។ |
| $22 \div 5 = 4$ | សំណល់ 2 | យើងថា 22 ចែកមិនដាច់នឹង 5 ។ |

**មួយចំនួនចែកដាច់នឹងមួយចំនួនទៀតកាលណាផលចែកមានសំណល់ 0 ។**

## លំហាត់

1. ចូរគូស ✓ ក្នុង ☐ បើអំណះអំណាងនោះត្រឹមត្រូវ

   **ក.** 33 ចែកដាច់នឹង 2 ☐ **ខ.** 44 ចែកដាច់នឹង 2 ☐

   **គ.** 30 ចែកដាច់នឹង 5 ☐ **ឃ.** 17 ចែកដាច់នឹង 3 ☐

   **ង.** 18 ចែកដាច់នឹង 9 ☐ **ច.** 20 ចែកដាច់នឹង 4 ☐

   **ឆ.** 24 ចែកដាច់នឹង 6 ☐ **ជ.** 26 ចែកដាច់នឹង 3 ☐

2. 4 ចែកដាច់នឹង 2 ។ តើ $4 \times 33$ ចែកដាច់នឹង 2 ដែរឬទេ?

3. 63 និង 39 ចែកដាច់នឹង 3 ។ តើ $63 + 39$ ចែកដាច់នឹង 3 ដែរឬទេ?

## ចំនួនចែកដាច់នឹង 2 និងចំនួនចែកដាច់នឹង 5

ក. 2 ចែកដាច់នឹង 2 ។
4 ចែកដាច់នឹង 2 ។
6 ចែកដាច់នឹង 2 ។
24 ចែកដាច់នឹង 2 ។

3 ចែកមិនដាច់នឹង 2 ។
5 ចែកមិនដាច់នឹង 2 ។
7 ចែកមិនដាច់នឹង 2 ។
17 ចែកមិនដាច់នឹង 2 ។

**មួយចំនួនចែកដាច់នឹង 2 កាលណាចំនួននោះជាចំនួនគូ ។**

ខ. 5 ចែកដាច់នឹង 5 ។
10 ចែកដាច់នឹង 5 ។
15 ចែកដាច់នឹង 5 ។
20 ចែកដាច់នឹង 5 ។

11 ចែកមិនដាច់នឹង 5 ។
12 ចែកមិនដាច់នឹង 5 ។
13 ចែកមិនដាច់នឹង 5 ។
14 ចែកមិនដាច់នឹង 5 ។

**មួយចំនួនចែកដាច់នឹង 5 កាលណាតួលេខខាងចុងនៃចំនួននោះស្មើនឹង 0 ឬ 5 ។**

## លំហាត់

1. ចូរគូស ✓ ក្នុង ☐ បើអំណះអំណាងនោះត្រឹមត្រូវ

ក. 142 ចែកដាច់នឹង 2 ☐
ខ. 258 ចែកដាច់នឹង 2 ☐
គ. 464 ចែកដាច់នឹង 2 ☐
ឃ. 251 ចែកដាច់នឹង 2 ☐

2. ចូរគូស ✓ ក្នុង ☐ បើអំណះអំណាងនោះត្រឹមត្រូវ

ក. 100 ចែកដាច់នឹង 5 ☐
ខ. 201 ចែកដាច់នឹង 5 ☐
គ. 244 ចែកដាច់នឹង 5 ☐
ឃ. 260 ចែកដាច់នឹង 5 ☐

## ចំនួនចែកដាច់នឹង 4 និងចំនួនចែកដាច់នឹង 3

ក. 116 ចែកដាច់នឹង 4 ។ 118 ចែកមិនដាច់នឹង 4 ។

220 ចែកដាច់នឹង 4 ។ 234 ចែកមិនដាច់នឹង 4 ។

តើពីរតួលេខខាងចុងនៃចំនួនខាងលើនេះចែកដាច់នឹង 4 ដែរឬទេ?

**មួយចំនួនចែកដាច់នឹង 4 កាលណាពីរតួលេខខាងចុងនៃចំនួននោះចែកដាច់នឹង 4 ។**

ខ. 12 ចែកដាច់នឹង 3 ។ 13 ចែកមិនដាច់នឹង 3 ។

15 ចែកដាច់នឹង 3 ។ 23 ចែកមិនដាច់នឹង 3 ។

តើផលបូកតួលេខនៃចំនួនខាងលើនេះចែកដាច់នឹង 3 ដែរឬទេ?

**មួយចំនួនចែកដាច់នឹង 3 កាលណាផលបូកតួលេខនៃចំនួននោះចែកដាច់នឹង 3 ។**

## លំហាត់

1. ចូរគូស ✓ ក្នុង ☐ បើអំណះអំណាងនោះត្រឹមត្រូវ

ក. 216 ចែកដាច់នឹង 4 ☐ ខ. 332 ចែកមិនដាច់នឹង 4 ☐

គ. 562 ចែកដាច់នឹង 4 ☐ ឃ. 604 ចែកដាច់នឹង 4 ☐

2. ចូរគូស ✓ ក្នុង ☐ បើអំណះអំណាងនោះត្រឹមត្រូវ

ក. 180 ចែកមិនដាច់នឹង 3 ☐ ខ. 803 ចែកដាច់នឹង 3 ☐

គ. 236 ចែកដាច់នឹង 3 ☐ ឃ. 732 ចែកដាច់នឹង 3 ☐

# 12 ប្រភាគ

## ប្រភាគតូចជាងឯកតា



$\frac{1}{3}$



$\frac{1}{2}$



$\frac{2}{5}$

ប្រភាគតូចជាងឯកតា ជាប្រភាគដែលមានភាគយក តូចជាងភាគបែង ។

## លំហាត់

1. ចូរបំពេញប្រភាគដែលតាងដោយផ្នែកផាត់ពណ៌ក្នុង ☐

ក.



☐

ខ.



☐

គ.



☐

2. ចូរវង់ចម្លើយប្រភាគដែលតាងផ្នែកឆូត

ក.



$\frac{2}{2}$ ; $\frac{2}{4}$ ; $\frac{4}{2}$

ខ.



$\frac{2}{6}$ ; $\frac{4}{2}$ ; $\frac{4}{6}$

គ.



$\frac{4}{4}$ ; $\frac{4}{8}$ ; $\frac{8}{4}$

# ប្រភាគស្មើនឹងឯកតា



$\frac{3}{3} = 1$



$\frac{2}{2} = 1$

- ការ៉េមមាន 3 ដើម ។ យើងយកទាំង 3 ដើម មានន័យថាយក 3 ភាគ 3 ស្មើនឹង 1 ។
- រូបនេះចែកជា 2 ចំណែកស្មើគ្នា ។ យើងយកទាំង 2 ចំណែក មានន័យថាយក 2 ភាគ 2 ស្មើនឹង 1 ។

ប្រភាគដែលស្មើនឹង 1 ហៅថា ប្រភាគស្មើនឹងឯកតា ។



## លំហាត់

ចូរគូសសញ្ញា ✓ ក្នុង ☐ ប្រភាគស្មើនឹងឯកតា

ក.



☐ ☐ ☐

ខ.



☐ ☐ ☐

គ.




☐ ☐ ☐ ☐ ☐ ☐ ☐

# ការប្រៀបធៀបប្រភាគ



$\frac{2}{4}$ ធំជាង $\frac{1}{4}$ ឬ $\frac{1}{4}$ តូចជាង $\frac{2}{4}$

យើងសរសេរ $\frac{2}{4} > \frac{1}{4}$ ឬ $\frac{1}{4} < \frac{2}{4}$

**ដើម្បីប្រៀបធៀបប្រភាគដែលមានភាគបែងដូចគ្នា យើងត្រូវប្រៀបធៀបភាគយកនឹងភាគយក ។**

## លំហាត់

ចូរប្រៀបធៀបប្រភាគដោយប្រើសញ្ញា " < ; > ឬ = " ក្នុង □

ក.



$\frac{3}{8}$ □ $\frac{5}{8}$

ខ.



$\frac{3}{10}$ □ $\frac{5}{10}$

គ.



$\frac{3}{3}$ □ $\frac{3}{3}$

ឃ.



$\frac{6}{10}$ □ $\frac{5}{10}$

# ការរកតម្លៃប្រភាគនៃមួយចំនួន

ឧទាហរណ៍ $\frac{2}{3} \times 9$ ស្មើនឹងប៉ុន្មាន?



យើងមានខ្មៅដៃ 9 ដើម ចែកជា 3 ចំណែកស្មើគ្នា ។ យើងបានខ្មៅដៃមួយចំណែកស្មើនឹង $9 \div 3 = 3$ ដើម ។ យើងយកខ្មៅដៃ 2 ចំណែកស្មើនឹង $2 \times 3 = 6$ ដើម ។

ដូចនេះ $\frac{2}{3}$ នៃ 9 ស្មើនឹង 6 ។

**ដើម្បីរកតម្លៃប្រភាគនៃមួយចំនួន ត្រូវយកចំនួននោះចែកនឹងភាគបែង ហើយគុណនឹងភាគយក ។**

## លំហាត់

ចូរប្រាប់តម្លៃប្រភាគខាងក្រោម

ក.



$\frac{5}{8}$ នៃ 8 ស្មើនឹង .......

ខ.



$\frac{1}{3}$ នៃ 9 ស្មើនឹង ......

គ.



$\frac{1}{2}$ នៃ 8 ស្មើនឹង ......

ឃ.



$\frac{1}{4}$ នៃ 8 ស្មើនឹង ......

$\frac{4}{8}$ នៃ 8 = ☐

ង.



$\frac{1}{3}$ នៃ 6 ស្មើនឹង ......

$\frac{3}{4}$ នៃ 4 = ☐

ច.



$\frac{2}{3}$ នៃ 9 ស្មើនឹង ......

$\frac{2}{5}$ នៃ 5 = ☐

# 13 ក្រាបរូបភាព លំនាំតំរូ ឱកាស

## ការបកស្រាយក្រាបរូបភាព

ចំនួនដើមផ្កាដែលសិស្សថ្នាក់ទី 3 បានដាំ




 តាងផ្កា 10 ដើម ។

ក្រាបរូបភាពនេះបង្ហាញ

**1.** ចំនួនដើមផ្កាដែលសិស្សថ្នាក់ទី 3 បានដាំ ។

**2.** ថ្នាក់ទី ៣"ក " បានដាំផ្កា 40 ដើម ។ **3.** ថ្នាក់ទី ៣"ខ" បានដាំផ្កា 50 ដើម ។

**4.** ថ្នាក់ទី ៣"គ " បានដាំផ្កា 30 ដើម ។ **5.** ថ្នាក់ទី ៣"គ" បានដាំផ្កាតិចជាងគេ ។

## លំហាត់

ចូរបកស្រាយក្រាបរូបភាពខាងក្រោម

ចំនួនឆ្នាំងដែលសិប្បកម្មផលិតបានរយៈពេល 6 ខែ ។




 តាងឆ្នាំង 100 ។

## ការសង់ក្រាបរូបភាព

បណ្ណាល័យមួយមានអ្នកអានសៀវភៅ ៖

ថ្ងៃចន្ទចំនួន 40 នាក់ ។

ថ្ងៃអង្គារចំនួន 30 នាក់ ។

ថ្ងៃពុធចំនួន 60 នាក់ ។

ថ្ងៃព្រហស្បតិ៍ចំនួន 40 នាក់ ។

ថ្ងៃសុក្រចំនួន 50 នាក់ ។

ថ្ងៃសៅរ៍ចំនួន 40 នាក់ ។

យើងអាចសង់ក្រាបរូបភាពបង្ហាញទិន្នន័យនេះដូចខាងក្រោម




 តាង 10 នាក់ ។  តាង 10 នាក់ ។

## លំហាត់

ឪពុកសានកត់ត្រាទិន្នន័យការលក់មាន់ក្នុងរយៈពេល 6 ខែដូចខាងក្រោម

| ខែ | មករា | កុម្ភៈ | មីនា | មេសា | ឧសភា | មិថុនា |
|---|---|---|---|---|---|---|
| ចំនួនមាន់ | 300 | 200 | 400 | 600 | 300 | 500 |

ចូរសង់ក្រាបរូបភាពតាមទិន្នន័យក្នុងតារាងខាងលើដោយកំណត់រូបភាពមួយតាងមាន់ 100 ។

## លំនាំគំរូស្ទួន

ក.  ; ........... ; ........... ;

ខ.  ; ........... ; ........... ;

គ.  ; ........... ; ........... ;

ឃ. ⇧⇨⇩⇦ ; ⇧⇨⇩⇦ ; ⇧⇨⇩⇦ ; ........... ; ........... ;

ង. 2 468 ; 2 468 ; 24…8 ; ........... ;

## លំនាំគំរូពង្រីក

ក.  ; ...........

ខ.  ; ...........

គ.  ; ...........

ឃ.  ; ...........

ង. 2 005 ; 2 010 ; 2 015

# លំហាត់

1. ចូរគូសសញ្ញា ✓ ក្នុង ☐ បើអះអាងថាជាលំនាំគំរូ

☐ ក. 

☐ ខ. 

☐ គ. 

☐ ឃ. 

2. ចូរបំពេញលំនាំគំរូ

ក. 

ខ. 

គ. 2 561; 2 561; 25...1; 2...6...1; ........; ........; ........;

3. ចូរបំពេញចំនួនក្នុង ☐

ក. 

ខ. 

## ឱកាសក្នុងជីវភាពរស់នៅ



ក្មេងពាក់អាវភ្លៀងពេលភ្លៀងធ្លាក់ ជាសកម្មភាព**កើតឡើងម្តងម្កាល** ។



សត្វតោអានសៀវភៅជាសកម្មភាព **មិនដែលកើតឡើង** ។

ព្រះអាទិត្យរះពីទិសខាងកើត ជាសកម្មភាព**កើតឡើងជានិច្ច** ។



## លំហាត់

ចូរមើលរូបខាងក្រោមរួចរកសកម្មភាពដែល

ក. កើតឡើងម្តងម្កាល ខ. កើតឡើងជានិច្ច គ. មិនដែលកើតឡើង



# ការប្រើពាក្យមួយចំនួនបញ្ជាក់ពីឱកាស



ពេលឆ្លុះកញ្ចក់រូបយើង **នឹងកើតឡើង**នៅលើកញ្ចក់



**មិនអាចកើតឡើង**



**អាចកើតឡើង**

## លំហាត់

1. ចូរមើលរូបភាពរួចគូសវង់ពាក្យដែលត្រូវនឹងសកម្មភាពនោះ



នឹងកើតឡើង
មិនអាចកើតឡើង
អាចកើតឡើង



នឹងកើតឡើង
មិនអាចកើតឡើង
អាចកើតឡើង



នឹងកើតឡើង
មិនអាចកើតឡើង
អាចកើតឡើង



នឹងកើតឡើង
មិនអាចកើតឡើង
អាចកើតឡើង

2. ចូរអាននិងគូសវង់ល្បះដែលត្រឹមត្រូវ

| **អាច** | **មិនអាច** |
|---|---|
| **ក.** ផ្ញើសំបុត្រទៅមិត្តភក្តិ | **ង.** លេបផ្លែត្របែកទាំងមូល |
| **ខ.** លេងបាល់ទាត់ក្នុងទឹក | **ច.** ស្ទាបកែងដៃឆ្វេងដោយប្រើដៃឆ្វេង |
| **គ.** ដើរលើជញ្ជាំង | **ឆ.** បណ្តុះរុក្ខជាតិពីគ្រាប់ពូជ |
| **ឃ.** ប្រើកន្ត្រៃកាត់ក្រដាស | **ជ.** បញ្ឈប់ការលូតលាស់ក្រចកដៃ |